ចេត្រ-ដែម

អធិការបឋមសិក្សាបារាំង - ខ្មែរ


# វិធីរៀនមើល-សរសេរ



## អក្សរសាស្ត្រខ្មែរ តាមរបៀបថ្មី សម្រាប់ថ្នាក់

# កុមារដ្ឋាន


DEUXIÈME EDITION



# NOUVELLE MÉTHODE
# DE
# LECTURE & D'ÉCRITURE KHMÈRES
# POUR
# LES DÉBUTANTS

par

CHET - CHHEM
INSPECTEUR DE L'ENSEIGNEMENT PRIMAIRE
FRANCO - KHMER



www.yerngshare.blogspot.com

ប្រកាសលេខ ៣.៦១៤ ចុះថ្ងៃទី ២២ ធ្នូ គ.ស. ១៩៥២ នៃរដ្ឋមន្ត្រីក្រសួងសិក្សាធិការ
បានបញ្ចូលសៀវភៅនេះ ទៅក្នុងពួកសៀវភៅសិក្សាទូទៅក្នុងសាលារៀន
ក្នុងសាធារណរដ្ឋខ្មែរ

# វិធីរៀនមើល-សរសេរ

អក្សរសាស្ត្រខ្មែរ តាមរបៀបថ្មី សម្រាប់ថ្នាក់

# កុមារដ្ឋាន

អ្នកនិពន្ធ

**ចេត្រ-ឆែម**

អធិការបឋមសិក្សា បារាំង-ខ្មែរ

---

ការផ្សាយរបស់



រក្សាសិទ្ធិ

ព.ស. ២៤៩៦ — គ.ស. ១៩៥៣

www.yerngshare.blogspot.com

# CONSEIL DES MINISTRES

## PRAKAS

N° 3614

.................. le Ministre
de l'Education Nationale, de la Jeunesse
et des Beaux Arts

Vu la Constitution ............

Vu le Traité Franco-Khmer du 8 Novembre 1949 et ses Accords d'application du 15 Juin 1950;

Vu le Kret N° 252–NS du 15 Juin 1952, modifié par ceux N° 254-NS et 354-NS des 17 Juin et 8 Août 1952, et le Kret N° 440-NS du 20 Septembre 1952, portant nomination du Cabinet ministériel;

Vu le Procès-Verbal en date du 9 Décembre 1952 de la Commission nommée par Prakas N° 2731 du 17 Décembre 1951;

Sur la proposition du Directeur de l'Instruction Publique.

**ARRETE :**

*ARTICLE PREMIER* — Le manuel ayant pour titre
វិធីរៀនមើល · សរសេរអក្សរសាស្ត្រខ្មែរតាមរបៀបថ្មី សំរាប់ថ្នាក់កុមារដ្ឋាន
(Nouvelle Méthode de Lecture et d'Ecriture Khmère pour les débutants) préparé par M. CHET-CHHEM, Inspecteur de l'Enseignement Primaire Franco-Khmer, est ajouté à la liste des manuels et publications scolaires dont l'usage est autorisé dans les écoles publiques ..............

*ARTICLE 2.*— Le Chef de Cabinet et le Directeur de l'Instruction Publique sont chargés, chacun en ce qui le concerne, de l'exécution du présent Prakas.

Phnom-Penh, le 22 Décembre 1952
*Signé :* ................
PENG-PAS YUKANTHOR

**Pour copie conforme :**
*P. le Secrétaire Général*
*du Conseil des Ministres et p. o.*
*Le Secrétaire Général Adjoint,*
Signé : SAN-THIEU

**Pour Ampliation :**
*Le Chef de Cabinet,*
Signé : YEIM-YISINN

www.yerngshare.blogspot.com

# អារម្ភកថា



ក្នុងសៀវភៅទំនើបនេះ យើងពុំបានយកតួព្យញ្ជនៈរៀងតាមវគ្គ មកបំបែកជាមួយនឹងស្រៈទេ ។ យើងយកព្យញ្ជនៈជាអឃោសៈមក បំបែកមុន ទើបយកព្យញ្ជនៈជាឃោស មកបំបែកជាក្រោយ ។

ក្នុងពួកអឃោសៈក្ដី ក្នុងពួកឃោសៈក្ដី យើងយកតួព្យញ្ជនៈស្រដៀងៗគ្នា មកបញ្ចូលក្នុងមេរៀនតែមួយ ដើម្បីឲ្យសិស្សស្រួលចំណាំ ដូចជា (ក) នឹង (គ) ។

បើកាលណាគ្រូបានសរសេរតួព្យញ្ជនៈមួយយ៉ាងធំនៅលើក្ដារខៀនបញ្ឈរ ដូចជា (ក) រួចសិស្សបានកសដៃទទេ សរសេរលើក្ដារឆ្នួនត្រឹមត្រូវហើយ គ្រូត្រូវយកព្យញ្ជនៈមួយតួទៀត ស្រដៀងគ្នានឹងព្យញ្ជនៈដើម មកសរសេរនៅខាងស្ដាំ ដូចជា (គ) ។

គ្រូឲ្យសិស្សប្រៀបប្រដូចតួមុនទៅនឹងតួក្រោយ ឲ្យរកត្រង់ណាដែលដូចគ្នា គេថែមអ្វីទៅលើតួមុន ទើបកើតបានជាតួក្រោយ ។

ឧបមា : (ក) នឹង (គ) មានរាងតួដូចគ្នា តែ (គ) មានគួបវង់មូលនៅក្នុងពីខាងដើម ។

លុះសិស្សចំណាំព្យញ្ជនៈក្នុងមេរៀនទីមួយ ៗ បានហើយ ទើបចាប់បំបែកទៅតាមរបៀបប្រើស្រៈនឹងព្យញ្ជនៈ ។

ការរៀបរៀងសៀវភៅនេះ កើតឡើងបានជារបៀបផែនដូច្នេះ ដោយសារអាស្រ័យនូវសេចក្ដីបំភ្លឺរបស់លោក ឈឹម-សុខ សាស្ត្រាចារ្យខាងវិជ្ជាបារាំងនៅសាលាបាលីជាន់ខ្ពស់ នៅភ្នំពេញ ដែលជាអ្នកធ្លាប់ប្រសប់ពិសោធឈ្លាសវៃក្នុងផ្លូវការសិក្សា ។

នៅទីបំផុតនេះ យើងសូមថ្លែងអំណរយ៉ាងឧត្តមចំពោះ លោក ឈឹម-សុខ ។

www.yerngshare.blogspot.com

# សេចក្តីកត់ហេតុ (ស្រង់)

គណៈកម្មការបានពិនិត្យសៀវភៅនេះ គ្រប់សណ្ឋានរៀងហូរហែទៅ ឃើញថា ក្នុងសៀវភៅនេះ មានរបៀបមួយយ៉ាងល្អដែរ ៖

១ ១– ញែកយក "ព្យញ្ជនៈ" សម្លេង "អឃោសៈ" រួចសម្លេង "ឃោសៈ" មកផ្សំនឹង "ស្រៈនិស្ស័យ" តាមដោយពួកនេះជាការងាយដល់កុមារនឹងស្គាល់ងាយ មួយយ៉ាង ។

១ ២– ជ្រើសយក "ព្យញ្ជនៈ" ណាដែលមានរូបភាពស្រដៀងគ្នាមកដាក់ផ្ទួនគ្នា នេះជាការអាចឲ្យកុមារងាយចំណាំ មួយយ៉ាងទៀតដែរ ។

រីឯបទទាំងឡាយក្នុងភាគទី ២ សមប្រកបនឹងថ្នាក់ "កុមារដ្ឋាន" ទាំងអស់ ។

សេចក្តីកត់ហេតុនេះ ធ្វើនៅថ្ងៃទី ៩ ខែធ្នូ គ.ស. ១៩៥២

សមាជិក — អនុប្រធានគណៈកម្មការ

ហត្ថលេខា : អ៊ុំ-ឈុំ, ស្រី-ស៊ុំ, — ហត្ថលេខា : ឈឹម-សុទ្ធ

មាស់-ឈឿន, ផេង-ជ្រីវ, មី-នាង,

ព្រំ-មុត, ស្វាយ-អ៊ុន

# សេចក្ដីណែនាំ

លោកជាគ្រូបង្រៀន ត្រូវរកក្រដាសក្រាស់ពណ៌ស កង ៤ ជ្រុងទ្រវែង បណ្ដោយ ១៤ ស.ម. ទទឹង ១០ ស.ម. ។

១)- យកក្រដាសនោះ មកចោះប្រហោង ៤ ជ្រុងទ្រវែង ទទឹង ៥ ស.ម. បណ្ដោយ ៦ ស.ម. ឲ្យចំកណ្ដាលក្រដាស ហើយសរសេរស្រៈនិស្ស័យលើផ្ទៃក្រដាសនោះពីខាងមុខ ឬពីខាងក្រោយ ពីខាងលើ ឬពីខាងក្រោមប្រហោងដែលចោះ តាមភាពស្រៈ ដូចបែបគំរូខាងក្រោមនេះ ។

នៅលើផ្ទៃម្ខាងទៀត សរសេរស្រៈមួយផ្សេងទៀត គឺជាការល្អដែរ ដើម្បីចំណេញក្រដាស ។



២)– យកក្រដាសមួយសន្លឹកទៀត មកសរសេរព្យញ្ជនៈ ១ តួមាន ឲ្យចំកណ្ដាល ល្មមទំនងប្រហាក់ដែលគេតែងធ្វើស្រះនោះ ដូចមានគំនូរខាងក្រោមនេះ ។




## របៀបបង្រៀនសរសេរតួអក្សរ

ឧបមាដូចជាបង្រៀនអក្សរ « ត » លោកជាគ្រូត្រូវ

ក— សរសេរតួអក្សរយ៉ាងធំនៅលើក្ដារខៀនបង្ហាញសិស្ស ។

ខ— នាំសិស្សឲ្យវាសតួអក្សរនេះនឹងដៃទទេ ។

គ— ហៅសិស្សម្នាក់ ឲ្យទៅសរសេរនៅលើក្ដារខៀន ដើម្បីឲ្យសិស្សឯទៀតកែ ឲ្យបានត្រឹមត្រូវឡើង ។

ឃ— ឲ្យសិស្សទាំងអស់គ្នាសរសេរលើក្ដារថ្មនលើកបង្ហាញគ្រូ ។ បើសិស្សណាសរសេរមិនត្រឹមត្រូវ លោកជាគ្រូត្រូវបង្គាប់ឲ្យសិស្សនោះកែឲ្យបានត្រឹមត្រូវឡើង ។

# របៀបប្រើព្យញ្ជនៈនឹងស្រៈដែលសរសេរលើក្រដាសក្រាស់

ឧបមាដូចជាបង្រៀនបំបែកអក្សរ "ត" លោកជាគ្រូត្រូវ ,

ក— លើកស្រៈ " េ ៀ " បង្ហាញសិស្សហើយសួរថា : នេះស្រៈអ្វី ?

១— យកក្រដាសដែលសរសេរតួអក្សរ "ត" មកដាក់ពីក្រោយក្រដាសដែលសរសេរស្រៈ " េ ៀ " ដូចបែបខាងក្រោមនេះ




ខ— សួរសិស្សថា : នេះគេអានថាដូចម្តេច ? ឆ្លើយថា : (តៀ) លោកគ្រូត្រូវសរសេរឲ្យច្បាស់ព្យាង្គនេះនៅលើក្តារខៀនបញ្ឈរ ។

យូរ ៗ ម្តង, គ្រូត្រូវប្រើរបៀបនេះ គឺឲ្យសិស្សរើសរកស្រៈមកផ្សំនឹងតួព្យញ្ជនៈ ដើម្បីឲ្យកើតជាព្យាង្គណាមួយ តាមចិត្តគ្រូរើស ។

# ភាគទី ១

មេរៀនទី - ១ អ អា

មេរៀនទី - ២ អិ អី

មេរៀនទី - ៣ អឹ អឺ

មេរៀនទី - ៤ អុ អូ អួ

មេរៀនទី - ៥ អើ អឿ អៀ អេ

មេរៀនទី - ៦ អែ អៃ អោ អៅ

មេរៀនទី - ៧ អុំ អំ អាំ អះ

មេរៀនទី - ៨ អុះ អេះ អោះ

## មេរៀនទី ៩ (សាឡើងវិញ)

អី អេះ អៅ អុំ

អែ អួ អៀ អើ ។

អាអំ អាអាំ អេះ អុះ ។

អា អំ អេះ អី ។ អា អាំ អុំ អី ។

## មេរៀនទី ១០

> កាលបើបង្រៀន "អ" ពេញតួផ្សំនឹងស្រៈនិស្ស័យរួចហើយ គ្រូត្រូវលុបតួ (អ) ចេញ ដើម្បីឲ្យនៅតែស្រៈនិស្ស័យ ។ គ្រូត្រូវហ្វឹកហ្វឺនសិស្សឲ្យចេះអាន ចេះសរសេរ ស្រៈនិស្ស័យទាំងអស់ជាប្រាកដ ។

ា ិ ី ឹ ឺ ុ ូ ួ ើ

ឿ ៀ េ ែ ៃ ោ ៅ ុំ ំ

ាំ ះ ។ ុះ េះ ោះ ។

## មេរៀនទី ១១

ា ិ ី ឹ ឺ ុ ូ ួ ើ ឿ ៀ េ ែ ៃ ោ ៅ ុំ ំ ាំ ះ ។ ុះ េះ ោះ ។

# ក ត

តា កិ កី តឹ តឺ កុ តូ កួ កើ កឿ កៀ តេ តែ តៃ តោ កៅ កុំ កំ តាំ កះ ។ តុះ តេះ កោះ ។

តុ កា តើ កោ តួ កូ តៃ កៀ កែ តោ

តែ កៃ តា តៅ ។

កែះ កោ(រ) ត តះ កោះ

តេះ តះ ក កោះ តេះ តោះ

កៅ អី តែ តោ អាកោ ។

តា អាំ ក កូ(រ) អី ។ អាកែ ក កែះ តុ ។

អាកៅ ក កេ(រ) អាតោ ។

## មេរៀនទី ១២

ា ិ ី ឹ ឺ ុ ូ ួ ើ ឿ ៀ េ ែ ៃ ោ ៅ ុំ ំ ាំ ះ ុះ េះ ោះ ។

# ប ហ

បា បិ បី ហឹ ហឺ ហុ ហូ បួ បើ បឿ បៀ ហេ ហែ ហៃ

បៅ បុំ បំ បាំ បះ ។ បុះ បេះ ហោះ ។



បើ ហា បូ ហឹ បី ហើ បៀ ហោ បៅ ។

បោ(រ) ហូ(រ) បោះ ហៀ(រ) បេះ ហែ ហៃ

អាហា(រ) បប(រ) បះបោ(រ) បបូ(រ) ហោះ ។

បប(រ)ហៀ(រ) ។ តាកៅ ហៅអាតោ ។

## មេរៀនទី ១៣

ា ិ ី ឹ ឺ ុ ូ ួ ើ ឿ ៀ េ ែ ៃ ោ ៅ ុំ ំ ាំ ះ ៗ ុះ េះ ោះ ៗ

# ប ឞ

បាបិបីបឹបឺបុបូបួបើបឿបៀបេបែបៃបោបៅបុំបំបាំបះៗបុះបេះបោះៗ

បុ បៅ បា បូ បេ

បុ បៅ បា បៃ បី បំ បោ

បែ បួ បាំ បៃ ៗ

បោះ បោ(រ) បូ(រ)

បេះ បុះ បៅ កែ បំ កា(រ) ប(រ) បា ៗ

បី គូ បេះ ប(រ) បា ៗ បៅ កៅ បាំ បៅ កែ

បុះ ៗ បៅបៃបាំបំការ ៗ តាបឿបេះបៃបៅ ៗ

មេរៀនទី ១៤

ា ិ ី ឹ ឺ ុ ូ ួ ើ ឿ ៀ េ ែ ៃ ោ ៅ ុំ ំ ាំ ះ ៗ ុះ េះ ោះ ៗ

# ដ ឌ

ដា ឌិ ឌី ឌឹ ឌឺ ដុ ដូ ដួ ដើ ឌឿ ឌៀ ដេ ដែ ដៃ ដោ ដៅ ដុំ ដំ ដាំ ឌះ ៗ ដុះ ឌេះ ដោះ ៗ

ដូ ដោ ដេ ឌូ ដើ ដុ ដា ដោ ដៅ ដេ ដែ ដៀ ។

ដូ(រ) ដោះ ដុះ ដុំដី ដុំដៃ បុះដែ ដំបែ ដំបៅ ។

កុំដោះដៃ ។ ចែតុំដាំបប(រ) ។ ចីដាបោះដីបី

ដុំ ។ ចៅតោចាំដែ ។ ចៅតាដៃដើ(រ)តេះតះ ។

## មេរៀនទី ១៥

ា ិ ី ឹ ឺ ុ ូ ួ ើ ឿ ៀ េ ែ ៃ ោ ៅ ុំ ំ ាំ ះ ។ ុះ េះ ោះ ។

# ស ណ

សា សិ សី សឹ សឺ ណុ ណូ ណួ សើ សឿ សៀ សេ ណែ ណៃ ណោ ណៅ

សុំ សំ សាំ សះ ។ ណុះ សេះ ណោះ ។

សេ ណែ សុ ណាំ

សៀ ណា សួ ណៅ

សុំ ណំ សោ ណើ ។

ដំណាំ សំដី ចំណុះ សំបែ សំណៅ សំដៅ

ដំណើ(រ) ស(រ)សៃ ចំណី ស(រ)សើ(រ) សំណុំ ។

ជីសោស(រ)សេ(រ) សំណៅ ។ តាសំបេះដាំ

ដំណាំ ។ អាណាសុំចំណី ។ ជីណៃសួ(រ)អី ។

មេរៀនទី ១៦

ា ិ ី ឹ ឺ ុ ូ ួ ើ ឿ ៀ េ ែ ៃ ោ ៅ ុំ ំ ាំ ះ ៗ ុះ េះ ោះ ៗ

# ឆ ខ ឡ

ឆា ខិ ខី ខឹ ខឺ ឡុ ឡូ ឡួ ឆើ ឆឿ ឆៀ ខេ ខែ ខៃ ឡោ ឡៅ ឆុំ ឆំ ឆាំ ឆះៗ ឆុះ ខេះ ឡោះៗ

ឆែ ខំ ឆា ខា ឡៅ ឆោ ខាំ ឆាំ ឡូ ខោ ឡែ ។

កៅឡៅ ឡាំ សាំ កែខៃ

ឡូ ឡា ឆាឆៅ ឡេះឡោះ

ខះក៏ ចោះឡូ ឡែឡ ។

ចៅ សៅ ចោះ ឡូ ។ បី តោ ដើ(រ) ឡែឡ

បី ខែ ។ បែ ឡា ខំ ដើ(រ) ខោ ចៅ ឆាំ ។ ចៅ

សំ ញាំ ដៃ តា កៅ ។ កុំ ឆា ឆៅ តា អាំ ។

www.yerngshare.blogspot.com

## មេរៀនទី ១៧ (សារឡើងវិញ)

ក ខ ប ឆ ដ ត ថ ណ ប ដ ស ហ ឡ

ក កា ខិ ខី ចឹ ចឺ ធុ ធូ ជួ ដើ តឿ ថៀ ថេ

ណែ ណៃ បោ ប៉ៅ ផុំ ផំ សាំ សះ ៗ ហុះ ឡេះ ឡោះ ៗ

កំពោ(រ) កំឡោះ ឆាំឆា ឆោឡោ បំពៅ

សស(រ) សសៀ(រ) សំដី សំឡី ហូ(រ)ហែ ។



ប៉ែសំបេះ

សំបូ(រ)។

ខាចៅ

តោឆេះ ។ ចែខាំសសោះអំពោះ ។ ចៅកែបេះ

បែ ។ ចៅតាអាំបេះកកែកក(រ) ។ ចីសោសុំសំ-

ឡកកូ(រ)បែឆាំ។ចៅកែឡាំខំសំបែសំណាបីដុំ។

# មេរៀនទី ១៨

អ៉ អ៉ា អ៉ិ អ៉ី អ៉ឹ អ៉ឺ អ៉ុ អ៉ូ អ៉ួ អ៉ើ អ៉ឿ

អ៉ៀ អ៉េ អ៉ែ អ៉ៃ អ៉ោ អ៉ៅ អ៉ុំ អ៉ំ អ៉ាំ អ៉ះ ។

អ៉ិះ អ៉ុះ អ៉េះ អ៉ោះ ។

អ៉ួអ(រ) អ៉ួអា អ៉ួអែ អ៉ឹអ៉ះ ។

ឲ្យសិស្សអាន សរសេរឲ្យបានត្រឹមត្រូវល្អ រូបលុប (អ) ចេញ

◌៉ ◌៉ា ◌៉ិ ◌៉ី ◌៉ឹ ◌៉ឺ ◌៉ុ ◌៉ូ ◌៉ួ ◌៉ើ ◌៉ឿ

◌៉ៀ ◌៉េ ◌៉ែ ◌៉ៃ ◌៉ោ ◌៉ៅ ◌៉ុំ ◌៉ំ ◌៉ាំ ◌៉ះ ។

◌៉ិះ ◌៉ុះ ◌៉េះ ◌៉ោះ ។

## មេរៀនទី ១៩

ា ិ ី ឹ ឺ ុ ូ ួ ើ ឿ ៀ េ ែ ៃ ោ ៅ ុំ ំ ាំ ះ ៗ ិះ ុះ េះ ោះ ៗ

# គ ភ

គា គិគីគឹគឺ គុគូគួ គើគឿគៀគេ គែគៃគោគៅ គុំគំគាំគះ ៗ គិះ គុះគេះ គោះៗ

គឹ ភា គួ ភោ ភៀ

ភឺ គុ គោ ភូ គេ ភើ

គូ ភៃ គុំ ភេ ៗ

គគី(រ) ភាសា គោបា សំភី គាថា សុភា ៗ

ចៅ គុំ ចាំ គេ ៗ បី ឡា ចេះ បី ភាសា ៗ

គុំភ(រ) ចៅគាំ ៗ គេថា ចៅខាំ ចេះគួ(រ)ភេ ៗ

## មេរៀនទី ២០

ា ិ ី ឹ ឺ ុ ូ ួ ើ ឿ ៀ េ ែ ៃ ោ ៅ ុំ ំ ាំ ះ ិះ ុះ េះ ោះ ។

# ព ញ

ពាពិពី ញឹញឺញុញូញួ ពើពឿពៀ ញេញែញៃញោញៅ ពុំពំពាំពះ ។

ពិះ ញុះ ពោះ ញោះ ។

ញាំ ពី ញើ ពា ញី ពើ ពួ ញោ ពូ ញុ

ពៃ ញោ ពៅ ញួ ពាំ ។

ពុះ ញុះ ពោះ ពួ(រ) ពពុះ សំពៅ ពូថៅ ពូកែ។



ចៅតាំគូ(រ)ញញួ(រ)។

តា ភេ ដាំ អំពៅ ។

ពូ សោ ថែ ពពែ ញី

ពី(រ) ។ ថែ ពៅ ចេះ ពិ សា ប ប(រ) ពោះតោ ។

## មេរៀនទី ២១

ា ិ ី ឹ ឺ ុ ូ ួ ើ ឿ ៀ េ ែ ៃ ោ ៅ ុំ ំ ាំ ះ ។ ុះ េះ ោះ ។

# រ វ

រា រិ រី រឹ រឺ រុ រូ រួ រើ រឿ រៀ រេ រែ រៃ រោ រៅ រុំ រំ រាំ រះ ។ រិះ រុះ រេះ រោះ ។

រេ វៃ រោ វា រើ វៅ រួ វេ

រា វិ រុំ វូ វៃ វៀ រាំ ។

រុះ រះ រិះ រេះ រឺ វា ចា រំពេ រុះ រើ រវៃ

របេះ ពីកេះ វេក រកា រវៃ ។

បីកុំបេះរាំ ។ តា ពៅ វះ ពោះគោ ។

ពពែ ញី ដើ(រ) រក ។ សំដីពូឆាំពីកេះ ។

បែ តាំ ពូកែរវៃអំបោះ ។ គេ ខំ ដេ(រ) រវៃ ។

## មេរៀនទី ២២

ា ិ ី ឹ ឺ ុ ូ ួ ើ ឿ ៀ េ ែ ៃ ោ ៅ ុំ ំ ាំ ះ ិះ ុះ េះ ោះ ៗ

# ល ឈ

លា លិ លី លឹ លឺ ឈុ ឈូ ឈួ លើ លឿ លៀ លេ ឈែ ឈៃ ឈោ ឈៅ លុំ លំ

លាំ លះ ៗ ឈិះ ឈុះ លេះ លោះ ៗ



លូ ឈោ លឿ ឈុំ

លា ឈៀ លី ឈឺ លៃ

ឈឿ លៀ ឈើ លោ ។

លោះ រលុះ លីលា រលំ លលា លលៃ ។

ពូ ឈុំ លីឈើ ។ បែ តាំ ឈឺពោះបីខែ ។

ចៅធាំ លា តាភា ។ ថៅកែ ឈ(រ) លើគោអី ។

កុំ ដើ(រ) ឈូ ធ(រ) លើដៃ ។

## មេរៀនទី ២៣

ា ិ ី ឹ ឺ ុ ូ ួ ើ ឿ ៀ េ ែ ៃ ោ ៅ ុំ ំ ាំ ះ ិះ ុះ េះ ោះ ។

# យ យ

យា យិ យី យឹ យឺ យុ យូ យួ យើ យឿ យៀ យេ យែ យៃ យោ យៅ យុំ យំ យាំ យះ ។

យិះ យុះ យេះ យោះ ។



យោ យុ

យួ យី យឺ

យោ យា យួ យើ យៅ យួ យាំ យី យុំ យំ ។

យួ(រ) ត យា(រ) យីកេ យូ(រ) យី ហោ រយះ

យោ(រ) យៅ យីអើ សាលាយុំ ។

តេយុំ ចៅរុំ ។ តាអាំ ចេះរាំ យីកេ ។ ចីតួស(រ)

សេ(រ)យីហោ ។ តួឈុំ ឈឺអី ដើ(រ) យូ(រ)ដៃ ។

មេរៀនទី ២៤

ា ិ ី ឹ ឺ ុ ូ ួ ើ ឿ ៀ េ ែ ៃ ោ ៅ ុំ ំ ាំ ះ ៗ ុះ េះ ោះ ៗ

# ម ជ

មាមិមី ជឹជឺជុជូជួ មើមឿមៀមេ ជែជៃជោជៅ មុំមំមាំមះ ៗ មិះជុះជេះមោះ ៗ

មើ ជំ មេ ជោ មៀ ជុ
មិ ជូ មា ជា មូ ជើ មាំ ។
មូ(រ) មមៃ ជូលី មីសួ
វិជី មមើ មមី(រ) មហារី ។

មេជាវីនេះបេះបីភាសា ។ មេអំបៅនោះហើ(រ)រេក ។ តាបឿខំថែមេពពែ ។ ពូភុំពិសាសំឡមីសួ ។ មេឃុំសៅហៅមេជួ ។

 

# មេរៀនទី ២៥

ា ិ ី ឹ ឺ ុ ូ ួ ើ ឿ ៀ េ ែ ៃ ោ ៅ ុំ ំ ាំ ះ ៗ ិះ ុះ េះ ោះ ៗ

## ដ ឌ

ដា ដិ ដី ឌឹ ឌឺ ឌុ ឌូ ឌួ ដើ ដឿ ដៀ ដេ ឌែ ឌៃ ឌោ ឌៅ ដុំ ដំ ដាំ ដះ ៗ ដិះ ដុះ ឌេះ ឌោះ ៗ

ដួ ឌោ ដាំ ឌូ ដៅ

ឌៀ ដុ ឌា ដិ ឌឺ ដើ ឌួ ។

ដួ(រ) ឌា(រ) ដូ(រ) ដំឌឺ

ដីតា រឌា ដីលា ឌេឌើ ។

ភូលីដំរះដី ។ តាសោពូកែថែដំឌឺ ។ ចៅខាំ

ដឿសំដីមារា ។ បីទុំដិះសេះញី ។ ដីពោឈ(រ)

ឌេឌើលើដៃ ។ ដីតាចៅដុំឌា(រ)ដាមហា ។

មេរៀនទី ២៦

ា ិ ី ឹ ឺ ុ ូ ួ ើ ឿ ៀ េ ែ ៃ ោ ៅ ុំ ំ ាំ ះ ៗ ុះ េះ ោះ ៗ

# ទ ន

ទា ទិ ទី ទឹ ទឺ ទុ ទូ ទួ ទើ ទឿ ទៀ ទេ ទែ ទៃ នោ នៅ ទុំ ទំ ទាំ ទះ ៗ ទិះ ទុះ ទេះ នោះ ៗ

ទេ នា ទៃ នួ ទុំ នាំ ទៅ នំ ទួ នៅ ទា ។

ទីទៃ នាវា ទំហំ នាគា ទំនេ(រ) ជានា

ទទា នាទី នគ(រ) ទំពា នាឡិកា ទេវតា។

កុំនាំវាទៅទីនោះ ។

តាពៅទៅជានាជីចាំ។

ពូជា ទា(រ)នាឡិកាពីចៅទុំ។ គេជិះរទេះ

គោទៅណា ។ ទីនេះពុំទំនេ(រ)ទេ ។

# មេរៀនទី ២៧

ត្រូវយកតួអក្សរដែលសរសេរលើក្រដាសក្រាស់មកបង្ហាញសិស្សមួយម្ដង ៗ ហើយសួរសិស្សថា : នេះអក្សរអី ? រួចត្រូវសរសេរតួអក្សរនោះត ៗ គ្នា ដូចខាងក្រោមនេះ ត្រូវហ្វឹកហ្វឺនសិស្សឲ្យចេះអាន ចេះសរសេរតួអក្សរទាំងនេះជាប្រាកដ ។

ក ខ គ ឃ ង

ច ឆ ជ ឈ ញ

ដ ឋ ឌ ឍ ណ

ត ថ ទ ធ ន

ប ផ ព ភ ម

យ រ ល វ ស ហ ឡ អ ។

មេរៀនទី ២៨

ា ិ ី ឹ ឺ ុ ូ ួ ើ ឿ ៀ េ ែ ៃ ោ ៅ ុំ ំ ាំ ះ ។ ុះ េះ ោះ ។

# ង៉ ញ៉ ន៉ ប៉ ម៉ យ៉ រ៉ ល៉ វ៉ ហ្វ

ង៉ា ញ៉ិ ញ៉ី ទ៉ឹ ទ៉ឺ ប៉ុ ប៉ូ ម៉ួ ម៉ើ យ៉ឿ រ៉េ រ៉ែ ល៉ៃ ល៉ោ រ៉ៅ ហ៉ុំ ហ៉ំ ហ៉ាំ ហ៉ះ ។

ម៉ុះ ញ៉េះ ង៉ោះ ។

ង៉េះ ង៉ោះ ញ៉េះ

ញ៉ោះ ញ៉ុំ ញ៉ើ

សេនា ប៉ាឆា ម៉ៃ

តាប៉ៃ ប៊ីអ ម៉ៃឆ មួម៉ៅ យ៉ាដាំ រយ៉ៃ បារី ដំរី

សាលាបាលី តាភៅ សាភា កាហ្វេ ។

ថៃម៉ៃដើ(រ)ញ៉ាំញ៉ើ ។ ម៉ៃដីម៉ៅមូ(រ)បារី ។

តាភៅយំពីកេះ ។ គេបោះខាររយ៉ៃទៅដី ។

មេរៀនទី ២៩

៊ា ៊ិ ៊ី ៊ឹ ៊ឺ ៊ុ ៊ូ ៊ួ ៊ើ ៊ឿ ៊ៀ ៊េ ៊ែ ៊ៃ ៊ោ ៊ៅ ៊ុំ ៊ំ ៊ាំ ៊ះ ៊ិះ ៊ុះ ៊េះ ៊ោះ ។

# ប៊ ស៊ ហ៊

ប៊ា ប៊ិ ប៊ី ប៊ឹ ប៊ឺ ស៊ុ ស៊ូ ស៊ួ ស៊ើ ស៊ឿ ហ៊ៀ ហ៊េ ហ៊ែ ហ៊ៃ ហ៊ោ ហ៊ៅ អ៊ុំ អ៊ំ អ៊ាំ

អ៊ះ ។ ហ៊ិះ ស៊ុះ ប៊េះ អ៊ោះ ។



សា ប៊ូ ឈ(រ)

ហ៊ើ ភា ស៊ី ដំហ(រ)

តៅ ហ៊ូ ភ ហូ ហឺ ហា ។

តា ប៊ូ បេះ តូ(រ) ភ ហូ ។ ជី អ៊ឺ ដើ(រ) ហឺ ហា ។ ដី ឡាំ បេះ ស៊ី តៅ ហ៊ូ ។ ហ៊ា ប៊ឺ ផា មេ ភា ស៊ី នៅ ដី ហៃ ។ នៅ ទី នេះ គេ ហ៊ៅ អី ។ ចៅ ម៉ៅ ទា(រ) សា ប៊ូ ប៊ី ដុំ ។ នា ភ នេះ ដំរៅ ពី(រ) ដំហ(រ) ។

## មេរៀនទី ៣០ (សាឡើងវិញ)



សុភាកុំស(រ)សេ(រ)ដីកាកោះ ។ ពូអាំដើ(រ)តែតោ ។ បៃដាលោះសេះពីថៅកែសំ ។ ថៅឆាំទៅលាដីតាភ ។ ហ៊ិកៅពិសាបប(រ)ទា ។ គេស(រ)សើ(រ)ថាថៅឃុំចេះគូ(រ)់ទេះ ។ នាភនោះចុះពីដីហែ ។ តាសំពូកែថែពពេញ ។ មេឃុំដុំរើសាលាបាលី ។ សារិកានេះចេះបីភាសា ។ ដីសៅលីពូថៅទៅចំកា(រ) ។ ថៅកែឈើបីខែ ។

## មេរៀនទី ៣១

នៅក្រោមតួអក្សរនីមួយ ៗ ត្រូវថែមជើងដូចមានរបៀបតទៅនេះ ។ សូមបង្ហាញសិស្សឲ្យឃើញច្បាស់ របៀបដែលគេសរសេរជើងអក្សរ ហើយឲ្យសិស្សហាត់សរសេរនៅលើក្ដារខ្មៀន ឲ្យបានត្រឹមត្រូវ ។

ក្ក ខ្ខ គ្គ ឃ្ឃ ង្ង    ច្ច ឆ្ឆ ជ្ជ ឈ្ឈ ញ្ញ

ដ្ដ ឋ្ឋ ឌ្ឌ ឍ្ឍ ណ្ណ    ត្ត ថ្ថ ទ្ទ ធ្ធ ន្ន

ប្ប ផ្ផ ព្ព ភ្ភ ម្ម យ្យ រ្រ ល្ល វ្វ ស្ស ហ្ហ អ្អ ។

## មេរៀនទី ៣២

បើសិស្សចេះអាន សរសេរតួអក្សរខាងលើនេះហើយ ព្រមទាំងជើងផង ត្រូវលុបតួអក្សរចេញ ឲ្យនៅតែជើង ។ សូមហ្វឹកហ្វឺនសិស្សឲ្យស្គាល់ ឲ្យចេះសរសេរជើងអក្សរនីមួយ ៗ ជាប្រាកដ ។

...្ក ...្ខ ...្គ ...្ឃ ...្ង    ...្ច ...្ឆ ...្ជ ...្ឈ ...្ញ

...្ដ ...្ឋ ...្ឌ ...្ឍ ...្ណ    ...្ត ...្ថ ...្ទ ...្ធ ...្ន

...្ប ...្ផ ...្ព ...្ភ ...្ម ...្យ ...្រ ...្ល ...្វ ...្ស ...្ហ ...្អ

---

ដ្ឋ = ឋ

www.yerngshare.blogspot.com

# សេចក្ដីណែនាំ
# ១

សិស្សស្គាល់តួអក្សរ និងជើងអក្សរអស់ហើយ ។ ត្រូវយកជើងអក្សរមួយមកផ្ទៀងនឹងតួអក្សរមួយ បញ្ចូលសំឡេងគ្នាទៅ ហាក់ដូចជាមានព្យញ្ជនៈតែមួយ ឧបមាដូចជា (ក) ដាក់ជើង ( ្វ ) បានជា (ក្វ) ឲ្យអានថា (ក - វ៉) ។

ប៉ុន្តែត្រូវចាំថា ជើងអក្សរណាដែលសម្លាប់បាន ដូចជា "ង ញ ន ម យ រ ល វ" តែងតែដូលសម្លេងតាមតួលើ ឧបមាដូចជា "ន" ផ្ទៀងនឹង "ខ" បានជា "ខ្ន" (ន ទៅជា ន៉) ។

ក្រៅពី ៨ តួនេះ ទោះយកទៅផ្ទៀងនឹងតួណា ៗ ក្តី វាទាញសំឡេងគេទៅតាមសភាពរបស់ខ្លួន ឧបមាដូចជា "ប" ផ្ទៀងនឹង "ម" នៅតែសំឡេង "ប" ដដែល (ម្ប) អានថា (ម - ប) ។

## របៀបបង្រៀនមើលផ្ទៀងជើង

១— ត្រូវសរសេរ "ក្វ ក្ត ក្ន ក្យ ក្ម ក្រ ក្ល ក្ស ក្ឋ" នៅក្តារខៀន ហើយឲ្យសិស្សអានម្នាក់ម្តង មួយពួកម្តង ។

២— ឲ្យសិស្សរកពាក្យណាដែលមានសំឡេង "ក្វ . . . . . ក្ឃ" ហើយសរសេរពាក្យនោះត ៗ គ្នា នៅលើក្តារខៀន ដូចក្នុងមេរៀនដែលមានតទៅខាងមុខនេះ ។

៣— ឲ្យសិស្សអានពាក្យទាំងនោះម្នាក់ម្តង មួយពួកម្តង ។

www.yerngshare.blogspot.com

## មេរៀនទី ៣៣

ង្ង ដ្ដ ន្ន ប្ប ម្ម ្រ ល្ល ស្ស អ

# ក្ង ក្ដ ក្ន ក្ប ក្ម ក្រ ក្ល ក្ស ក្អ

ក្ង ក្ងា ក្ដិ ក្ដី ក្នឹ ក្នឺ ក្បុ ក្បូ ក្បួ ក្មើ ក្មឿ ក្រៀ ក្រេ ក្លែ ក្លៃ ក្លោ ក្លៅ ក្សុំ ក្សំ ក្អាំ ក្អះ ។

ក្ងេះ ក្ងួ(រ) ក្ដា(រ) ក្ដៅ ក្បួ(រ) ក្បោះ ក្រគ(រ)

ក្រញាំ ក្រទឺក្រទា ក្របៅ ក្រពះ ក្រយៅ ក្រមុំ

ក្រឡ ក្រឡៅ ក្រៃ ក្រៅ ក្លា ក្លើ ក្អឺ ក្អៃ ។

ចៅក្រំ ជំនុំជំរះក្ដី ។ ក្របីឈ(រ)

ក្បែ(រ)គោ ។ បែពៅ ក្រញី ហាប៊ី ។

បីភុំ ជិះឆាភាទៅក្របេះ ។ ក្លើហា

កៅពីសាតែ សំឡក្ដៅ ។ ដីសៅ

កេះក្រម(រ) ដំបៅ ។ ពូ ឈុំដើ(រ) ក្រទឺក្រទា ។

## មេរៀនទី ៣៨

ច្ច ញ្ញ ន្ន ម្ម យ្យ ល្ល វ្វ ស្ស ជ្ជ ទ្ទ ព្ព

# ខ្ច ខ្ញ ខ្ន ខ្ម ខ្យ ខ្ល ខ្វ ខ្ស ខ្ជ ខ្ទ ខ្ព

ខ្ច ខ្ចា ខ្ញិ ខ្ញី ខ្នឹ ខ្នឺ ខ្មុ ខ្មូ ខ្យួ ខ្យើ ខ្លឿ ខ្លៀ ខ្វេ ខ្វែ ខ្វៃ ខ្វោ ខ្សៅ ខ្ញុំ ខ្ជំ ខ្ទាំ ខ្ពះ ។

ខ្ចី ខ្ចៅ ខ្ជី ខ្ជា

ខ្ញី ខ្ញុំ ខ្ញាំ ខ្ទះ ខ្ទុះ

ខ្នា(រ) ខ្នុ(រ) ខ្នោះ

ខ្មី ខ្មេះ ខ្មែ(រ) ខ្មៅ

ខ្លា ខ្លី ខ្លៅ ខ្លះ

ខ្វា(រ) ខ្វែះ ខ្វះ ខ្សែ ខ្សោះ ។

ជីម៉ៅខ្ចីខ្មៅដៃពៅសៅ ។ ខ្មែ(រ)បេះដាំខ្ញី ។ គេទៅខ្នា(រ)ក្រពើ ។ ខ្លាទះគោពូភេ ។ តាពៅលើខ្នោះទៅណា ។ ប៉ៃឆាំពិសាខ្ចៅ ។ ដំបៅតាកែហូ(រ)ខ្ទុះ ។ កុំស(រ)សេ(រ)ខ្ជីខ្ជា ។ ខ្ញុំលោះខ្សែដៃពីគេ ។

## មេរៀនទី ៣៩

្ន ្ម ្រ ្ន ្ម ្ល ្វ

# គ្ន គ្ម គ្រ ឃ្ន ឃ្ម ឃ្ល ឃ្វ

គ្ន គ្នា គ្និ គ្នី គ្មិ គ្មី គ្រុ គ្រូ គ្រួ ឃ្នើ ឃ្នឿ ឃ្នៀ ឃ្លេ ឃ្លែ ឃ្លៃ ឃ្លោ ឃ្លៅ

ឃ្វុំ ឃ្វំ ឃ្វាំ ឃ្វះ ។

គ្នី គ្នា គ្នេ(រ)

គ្រឹ គ្រានេះ គ្រាក្រ

គ្រឹះ គ្រុះ គ្រូ គ្រៃ

គ្រោះ គ្រិ គ្រាំ គ្រា ។

ឃ្មោះ ឃ្មុំ ឃ្លា ឃ្លេ ឃ្លៃ ឃ្វុំ សេះ ឃ្លាំ ចោ(រ) ខ្លា ឃ្មុំ។ ដឹម៉ៅ ឈ(រ) ចាំ គ្នីគ្នា ។ ចៅ ឆាំ សំពះ លា គ្រូ ។ ខ្ញុំ ចុះ ពី លើ គ្រែ ។ តា សុំ ខ្ចី ឃ្មោះ ចែ ផៃ ។ ឃ្មុំ ធំ ទំ នៅ ក្បែ(រ) ប៉ា ឆា ។ ពូ ឈុំ ចេះ ឃ្វុំ សេះ ។ គ្រូ ខ្ញុំ ស(រ) សេ(រ) តែ បី ឃ្លា ។ គ្រា នេះ ខ្ញុំ នៅ ឃ្លាំ ចោ(រ) ។

មេរៀនទី ៣៦

្យ ្រ ្ក ្វ ្ដ ្ន ្ម ្ល អ ្គ ្ព

# ប្យ ប្រ

# ឆ្ក ឆ្វ ឆ្ដ ឆ្ន ឆ្ង ឆ្ល ឆ្ម ឆ្អ ឆ្គ ឆ្ព

ប្យ ប្យា ប្រិ ប្រី ឆ្កឹ ឆ្កឺ ឆ្វុ ឆ្វូ ឆ្ញួ ឆ្ដើ ឆ្នឿ ឆ្នៀ ឆ្មេ ឆ្មែ ឆ្លៃ ឆ្អោ ឆ្អៅ ឆ្គុំ ឆ្គំ ឆ្ពាំ ឆ្ពះ ។

ប្យា(វ) ប៉ោះ ប្យោះ ប្រមុះ ប្រវ៉ា ប្រឡោះ ប្រឡុំ

ប្រុះ ប្រែះ ប្រោះ ឆ្កា ឆ្កើះ ឆ្កែ ឆ្គាំ ឆ្ដោ ឆ្នៃ ឆ្នាំ ឆ្ពោះ

ឆ្មា ឆ្លេ ឆ្លា ឆ្លុះ ឆ្អើ(វ) ឆ្អេះ ឆ្អៅ ។

តាកែបែ ប្យា(វ) ដំណាំ ។ ជីមៅឆ្កើះខ្មៅឆាឡូកា ។ ខ្ញុំចាំ ឆ្នាំ ខ្ញុំគឺ ឆ្នាំបោះ ។ គេដើ(វ) ឆ្ពោះទៅបំកា(វ) ។ ឆ្កែតាប៊ូខាំ ឆ្មាបែសៅ ។ អាឆាំដើ(វ) ឆ្លេ ឆ្លា ។ ឆៅទំអេះអេះអឺ ។ ភាំ ប្រឡុំគំន(វ) ។

មេរៀនទី ៣៧

្រ ្វ ្ង ្ន ្ម ្ល ្វ

# ជ្រ ជ្វ ឈ្ង ឈ្ន ឈ្ម ឈ្ល ឈ្វ

ជ្រ ជ្រា ជ្រិ ជ្វី ជ្វឹ ជ្វឺ ឈ្ងុ ឈ្ងូ ឈ្ងួ ឈ្នើ ឈ្នឿ ឈ្នៀ ឈ្មេ ឈ្មែ ឈ្មៃ

ឈ្លោ ឈ្លៅ ឈ្លុំ ឈ្វំ ឈ្វាំ ឈ្វះ។



ជ្រិអោ ជ្រិដំ ជ្រិលិះ ជ្រឹះ

ជ្រុះ ជ្រេ ជ្រៃ ជ្រែ ជ្រោះ

ជ្រៅ ជ្រី ជ្រះ ជ្វា ជ្វាលា

ឈ្នះ ឈ្មោះ ឈ្លើ ឈ្លោះ។

ខ្លា ឃ្មុំ ឆោះ ឈ(រ)

ជ្រិអោ ។ នាឡិកា ខ្ញុំ ជ្រុះ

ខ្ទៅ ។ កុំនៅក្បែ(រ)ជ្រានេះ ។ ជ្រោះនោះជ្រៅ ។ ខ្មែ(រ)

ខ្លះបេះភាសា ជ្វា ជ្រៅ ជ្រះ ។ សេះខ្ញុំ ឈ្នះសេះខ្មៅ ហៅកែបី ។

ជីតាហៅម៉ៅឈ្មោះអី? ។ កុំឈ្លោះគ្នានៅក្រៅសាលា ។

www.yerngshare.blogspot.com

មេរៀនទី ៣៨

្ន ្ប ្ម ្រ ្ល ្វ ្អ

# ត្ន ត្ប ត្ម ត្រ ត្ល ត្វ ត្អ

ត្ន ត្នា ត្និ ត្នី ត្បី ត្បឺ ត្មុ ត្មូ ត្មួ ត្រើ ត្រឿ ត្រៀ ត្រេ ត្រែ ត្លៃ ត្លោ ត្លៅ ត្វុំ ត្វំ ត្អាំ ត្អះ។



ត្បា(រ) ត្មុះ ត្រជិ ត្រឈៃ ត្រដ(រ) ត្រ-សុំ ត្រសេះ ត្រឡុំ ត្រា ត្រាដូ ត្រី ត្រេះត្រុះ ត្រៃ ត្រេះ ត្រុំ ត្រាំ សាត្រា ត្លៃ ត្នុំ ត្វា ត្អូ ។

ជីខ្មៅត្បា(រ)ប្រមុះ ។ តាសៅទៅធ្នុះត្រីឆ្កោ ។ ពៅខាំត្រដ(រ)ដើ(រ)ទៅណា ។ បៃម៉ៅយូ(រ)ត្រីឆ្អើ(រ) ។ មេឃុំបោះត្រាលើសំណៅ ។ ពូឈុំទៅខ្ចីសាត្រាគេបីខ្សែ ។ គ្រូភុំទៅត្រាំខ្នា(រ) ។

## មេរៀនទី ៣៩

ក្ក ង្ង ន្ន ម្ម ល្ល វ្វ ព្ព

# ថ្ក ថ្ង ថ្ន ថ្ម ថ្ល ថ្វ ថ្ព

ថ្ក ថ្កា ថ្កិ ថ្កី ថ្ងឹ ថ្ងឺ ថ្នុ ថ្នូ ថ្នួ ថ្មើ ថ្មឿ ថ្មៀ ថ្លេ ថ្លែ ថ្លៃ ថ្វោ ថ្វៅ ថ្ពុំ ថ្ពំ ថ្ពាំ ថ្ពះ ។

ថ្ក(រ) ថ្ងូ(រ) ថ្ងៃ ថ្នេ(រ) ថ្នាំ ថ្មី ខ្មែ ថ្លា ថ្លៃ ថ្លៃថ្នូ(រ) ថ្វីដៃ ថ្ងៃ យុថ្កា ។ បី ម៉ែ ថ្ងូ(រ) ហា ឈឺ ប្រមុះ ។ ថ្ងៃ សៅ(រ៍) ខ្ញុំ ទៅ ត្រា ថ្នា(រ) ។ ថ្នាំ គ្រូ សៅ ពូកែ ។ តា ពៅ លឺ ថ្មី ទៅ ណា ? ។ ថ្នាំ ខ្មែ(រ)ក៏ថ្លៃដែ(រ) ។ ការទា ជាសំឡ ថ្លៃថ្នូ(រ) ។ រទេះ បី ណៃ នៅ ថ្មី ។ ការ នេះ ជា ថ្វី ដៃ គ្រូ ខ្ញុំ ។ ថ្ងៃ នោះ បុះ ពី ក្រ-បេះ ។ គេ ពុំ ដើ(រ) ទេ នៅ វេលា ថ្ងៃ ក្ដៅ ។

## មេរៀនទី ៤០

្រ ្ង ្ន ្ម ្យ ្ល ្វ

# ទ្រ ទ្វ ធ្ង ធ្ន ធ្ម ធ្យ ធ្ល ធ្វ

ទ្រ ទ្រា ទ្វិ ទ្វី ទ្វឹ ទ្វឺ ធ្នុ ធ្នូ ធ្នួ ធ្មើ ធ្មឿ ធ្មៀ ធ្យេ ធ្យែ ធ្យៃ ធ្លោ ធ្លៅ ធ្វុំ ធ្វំ ធ្វាំ ធ្វះ ។

ទ្រគោះ ទ្រនំ ទ្រហោ ទ្រូ ទ្រាំ ទ្រ ទ្វា(រ) ធ្នូ

ធ្មៃ ធ្លា ធ្លុះ ធ្នូ ធ្លៀ ធ្លះ ធ្វើ ។

តាភឿទំលើទ្រនំ ។

ពៅកែទ្រហោយំ ។ តា

ពៅលីទ្រូទៅណា? ។

គេខំទ្រាំទ្រដឹដឺជាយូ(រ)ថ្ងៃ ។ ទ្វា(រ)នេះធំ ។ ពៅមៅខ្ចីធ្នូ

ពូខ្មៅ ។ បែសោរសៃខ្សែធ្មៃ ។ គេដើ(រ)ក្រៅធ្លា ។ មេឃុំ

ទៅធ្វើកា(រ) ។ ខោជីសំធ្លុះ ។ គេធ្វើធ្នើ(រ)លើទូ ។

មេរៀនទី ៤១

ដ្ត ្រ ្ល

# ប្ត ប្រ ប្ល

ប្ត ប្តា ប្តិ ប្រិ ប្រឹ ប្រឺ ប្លុ ប្លូ ប្លួ ប្តើ ប្តឿ ប្តៀ ប្រេ ប្រែ ប្រៃ ប្លោ ប្លៅ ប្តុំ ប្តំ ប្តាំ ប្តះ ។



ប្តី ប្តូ(រ) ប្រកា(រ) ប្រខាំ ប្រគំ ប្របី ប្រឆេះ ប្រជុំ ប្រឈ្លោះ ប្រដៅ ប្រណី ប្រទះ ប្របេះ ប្រផែះ ប្រពៃ ប្រែ កាំប្រមា ប្រឡេះ ប្រឡៅក្កែ ប្រសើ(រ) ប្រហើ(រ) ប្លាធ្លូ ។

បែឆាំទៅហៅប្តី ។ ជីពោប្តូ(រ)ខ្សែនាឡិកា ។ តាកែដើ(រ)ទៅប្រទះខ្លាឃ្មុំ ។ សេះប្រផែះឈ្នះសេះខ្មៅ ។ នៅទីនោះគេប្រជុំគ្នាធ្វើអី ។ សំឡេងធុំប្រហើ(រ) ។

## មេរៀនទី ៤២

ក្ក ង្ង ច្ច ញ្ញ ដ្ដ ទ្ទ ល្ល ស្ស អ្អ គ្គ វ្វ

# ផ្ក ផ្ង ផ្ច ផ្ញ ផ្ដ ផ្ទ ផ្ល ផ្ស ផ្អ ផ្គ ផ្វ

ផ្ក ផ្កា ផ្ងិ ផ្ងី ផ្ចឹ ផ្ចឺ ផ្ញុ ផ្ញូ ផ្ដួ ផ្ដើ ផ្ទឿ ផ្ទៀ ផ្លេ ផ្លែ ផ្សៃ ផ្សោ ផ្អៅ ផ្អុំ ផ្គំ ផ្វាំ ផ្វះ ។

ផ្កា ផ្គូំ ផ្គុំ ផ្ងំ ផ្ញើ ផ្ដា សា ផ្ដែ ផ្ដាំ ផ្ដៅ ផ្ដុំ ផ្វី ផ្វើ(រ) ផ្វៃ ផ្វិះ ផ្វី(រ)

ផ្លែ ផ្លុំ ផ្សា(រ) ផ្សំ ផ្គុំ ផ្សៃ ផ្សំ ផ្សាំ ផ្សះ ផ្សា ផ្អ្វី(រ) ផ្អែះៗ ។

ពៅ នាំបេះផ្កា បំប៉ា ប្រាំ។ តាភេ ផ្ដាំ ពៅ ហា កុំ ប្រឈ្លោះគ្នា ។ ពូសៅផ្ញើត្រីឆ្ដោទៅបីជា ។ តាកែទៅបេះផ្លែផ្ដៅ ។ ពៅក្រិផ្សះផ្សាគូក្ដី ។ បៃសំពិសាសំឡប្រហើ(រ)ផ្វី ។ បីភុំឈឺពោះផ្អែះៗ ។ គេផ្សំថ្នាំផ្សះដំបៅ ។

# មេរៀនទី ៤៣

ន យ រ ល អ ង ជ ញ ន ល

## ព្ន ព្យ ព្រ ព្ល ព្អ ភ្ង ភ្ជ ភ្ញ ភ្ន ភ្ល

ព្ន ព្នា ព្យិ ព្យី ព្រិ ព្រី ព្លុ ព្លូ ព្លួ ព្អើ ព្អឿ ភ្ងៀ ភ្ងេ ភ្ជែ ភ្ជៃ ភ្ញោ ភ្ញៅ ភ្នុំ ភ្នំ ភ្លាំ ភ្លះ ។

ព្នៃ ព្នៅ ព្យុះ ព្យួ(រ) កំព្រា ព្រឺ ព្រៃ ព្រៃ ព្រោះ ព្រៅ

ព្រិ ព្រិះ ព្អិះ ភ្ងា(រ) ភ្ជួ(រ) ភ្ញី ភ្នំ ភ្លា ភ្លើ ភ្លឺ ភ្លៅ ។

ប៉ៅ ម៉ៅ បេះ ផ្លែ ព្នៅ ។ បៃ ពៅ ព្យួ(រ) ត្រី ផ្អើ(រ) ក្បែ(រ) ផ្នើ(រ) ។ ប៉ៅ កំព្រា ផេះ ប្ញូ(រ) ឋា ក្រ ។ ប៉ៅ កែ បី នាំ ព្រៃ ពី ព្រៃ នគ(រ) ។ តា កែ ភ្ជួ(រ) បំកា(រ) ។ គេ បុះ ពី ភ្នំ ក្រពើ ។ បី ភ្នុំ ពិសា ភ្លា ត្រី ផ្ដោ ។ ជី ឆាំ ដើ(រ) តេះ តះ ព្រោះ ភា ឈី ភ្លៅ ។

## មេរៀនទី ៤៤

ក្ក ខ្ខ ច្ច ដ្ដ ស្យ ហ្ហ អ ន្ទ ឈ្ឈ ញ ន្ង ទ្ន យ្យ ស្រ ល្ល

# ម្ក ម្ខ ម្ច ម្ដ ម្យ ម្ហ ម្អ

# ម្ទ ម្ឈ ម្ទ ម្ង ម្ន ម្យ ម្រ ម្ល

ម្ក ម្កា ម្ខិ ម្ខី ម្ចឹ ម្ចឺ ម្ដុ ម្ដូ ម្យួ ម្ហើ ម្អឿ ម្ទៀ ម្ឈេ ម្ញែ ម្ងៃ ម្នោ ម្យៅ ម្រុំ ម្រំ ម្លាំ ម្លះ ។

ម្លូ(វ) ម្ញ៉ែ ម្ញុំ ម្នឹ ម្នា ម្នោ ម្នះ ម្រុ ម្រះព្រៅ ម្លិះ ម្លូ

ម្ល៉េះ ម្ល៉ោះ ម្សៅ ម្សេះៗ ។

ប៊ីជាពិសាសំឡម្លូ(វ) ត្រី ប្រា ។ តាកែម្នឹម្នាទៅផ្ទះ ។ ពូឈុំដាំផ្កាម្លិះ ។ ប៉ៃពៅឈឺអ៊ីយូ(វ) ម្ល៉េះ ។ ហ៊ាកៅឈ្លីម្សៅធ្វើនំប៉ៅ ។ នៅទីនេះធុំអ៊ីម្សេះៗ ។ អាឆាំទៅបេះម្រះព្រៅ ។ មាខ្ញុំធ្វើកា(វ) នៅម្លូព្រៃ ។

## មេរៀនទី ៤៩

ខ្ខ ប្យ ហ្ហ អ គ្គ ង្វ ព្ត ម្ន រ្វ

# ល្ខ ល្ប ល្ហ ល្អ

# ល្គ ល្វ ល្ត ល្ន ល្ម

ល្ខ ល្ខា ល្បិ ល្បី ល្ហឹ ល្ហឺ ល្អុ ល្អូ ល្អួ ល្គើ ល្គឿ ល្វៀ ល្វេ ល្តែ ល្តៃ ល្នោ

ល្នៅ ល្វុំ ល្វំ ល្វាំ ល្វះ ។

ល្វី ល្វើ ល្បី ល្បះ

ល្តៅ ល្នី ល្នើ ល្នៃ ល្វា

ល្វែ ល្ហៃ ល្អី ល្អះ ។

ចៅសៅឈើទៅជាល្វីល្វើ ។ បៃ ខាំផ្ញើល្តៅទៅជីតា ។

គ្រី ប្រាស៊ីផ្លែល្វា ។ ចីៗល្ហែតែថ្ងៃសៅ(រ៍) ។ តាកែបេះ

ផ្លើល្អីល្អ ៗ ។ ប្នាំគ្រូសំល្បីជាយូ(រ)ឆ្នាំ ។ គេដាំល្វានៅ

ក្បែ(រ)ភ្នំ ។ សំដីបីតួពុំល្អះសោះ ។ ផ្លែល្វាល្អតែក្រៅទេ ។

## មេរៀនទី ៤៦

ក្ក ង្ង ញ្ញ ដ្ដ ន្ន ប្ប ម្ម ្រ ល្ល វ្វ អ្អ គ្គ ទ្ទ ព្ព

# ស្ក ស្ង ស្ញ ស្ដ ស្ន ស្ប ស្ម

# ស្រ ស្ល ស្វ ស្អ ស្គ ស្ទ ស្ព

ស្ក ស្កា ស្ងិ ស្ងី ស្វឹ ស្វឺ ស្ដុ ស្ដូ ស្នួ ស្នើ ស្បឿ ស្បៀ ស្មេ ស្រែ ស្រៃ ស្ងោ



ស្ងៅ ស្អុំ ស្ដំ ស្ញាំ ស្ពះ ។

ស្កា(រ) ស្កាំ ស្គ(រ)

ស្ងោ(រ) ស្វែ ស្ដី ស្ដៅ ស្ទុះ

ស្ទោះ ស្នា ស្នោ ស្បៃ ស្ពឹ ស្ពៃ ស្មា ស្មៅ ស្រកា ស្រគំ ស្រងែ

ស្រណោះ ស្រទំ ស្រឡៅ ស្រី ស្រែ ស្លា ស្លែ ស្វា ស្អុះ ស្អំ ។

ជី ម្លិះ ស្ងោ(រ) ស្នោ ។ ចៅ កំព្រា នេះ ដិ ចៅ ស្វែ ។

គេ ទៅ បេះ ផ្កា ស្ដៅ ។ ពែ ខាំ ស្ទែ ល្ង ។ ស្រី ក្រមុំ នេះ ផ្ញើ

នំ ផ្កា ស្នោ ។ តាកែ ពិសា ស្ពៃ ស្ងោ(រ) ។ ក្របី ស៊ី ស្មៅ ខ្ចី ។

## មេរៀនទី ៤៧ (សាឡើងវិញ)



ពូម៉ា ខំភ្ជួ(រ) ស្រែ ។ ដីខ្មៅ ទៅ បេះផ្លែ ក្របៅ ។ ក្របីនោះស៊ីស្មៅខ្ចី ។ ខ្ញុំខ្ចីសាត្រាគេបីខ្សែ ។ បៃព្រិ ស្ងោ(រ) ត្រីឆ្តោ ។ សុភាផ្សះផ្សាគូក្តី ។ ថ្ងៃនេះគេផ្ញិត្រៃ ផ្ញើអ្វី ។ គេថ្ងូ(រ) ថាឆ្នាំនេះត្រីថ្លៃ ។ ខ្លាឃ្មុំនេះខ្មៅ ។ តា ថាផ្កាព្រៃធ្វើបំកា(រ) ។ ធ្វានេះបេះភាសាខ្មែ(រ) ជ្រៅជ្រះ ។ ថៅកែសំផ្ញើម្សៅជ្រៃទៅក្របេះ ។ ស្រីៗនាំគ្នាទៅបេះ ផ្កាស្នោ ។ ឆ្កែបីភុំឈ្មោះអាម្លិះ ។ គ្រូខ្ញុំប្រដៅថាកុំ ប្រឈ្លោះគ្នា ។ គ្រែស្រឡៅនេះធ្វើពីត្រាំខ្នុ(រ) ។

## មេរៀនទី ៤៨

អង អង់ អាង អាំង អ៊ង អ៊ង់ អ៊ាង អ៊ាំង

កង កង់ ខាង គង គង់ ឃាំង បង បាំង ធុង ជង់ ឈោង ញាំង ដួង តុង ឋាំង ទុង ឆាង បង់ ឃុំង ផង់ ពាង ឡាំង ។

ក្ដង ក្មេង ខ្យង ខ្លាំង គ្រឿង ឃ្នាង ឃ្លង់ ប្យាំង ឆ្លាំង ជ្រុង ឈ្នាង ត្បូង ត្រែង ប្នង ប្លាង ទ្រូង ធ្យូង ប្ដឹង ប្រេង ផ្អៀង ផ្សែង ភ្លើង ម្ដង ល្បែង ល្ងង់ ស្នែង ស្អាង ។



ពី កង់ ជិះ កង់ ទៅ លេង កំពង់ឃ្លាំង ។ គេលីប្នុងទៅ ដង ត្រី ក្នុង បឹង ។ ឆាង តេង ផ្អៀង ផ្អុង នៅ ខាង ត្បូង ជើង តាំង ។ មីង ហោង ខឹង ឆឹង បង ។ ពូ បេង ប្រឡង ធ្វើ ប្លង់ តុង ។ គេ ក្រែង ភ្លើង ផ្សែង ។ បង ខ្ញុំ បង់ ពិ សា ធំ បាំង ។

## មេរៀនទី ៤៩

អញ អញ់ អាញ អាញ់ អ៊ិញ អ៊ិញ់ អ៊ាញ អ៊ាញ់

កាញ់ ឃើញ បាញ់ បេញ ជួញ ដេញ ទិញ ធុញ

បាញ់ ពេញ រួញ វិញ សាញ សំឡាញ់ បាញ់ កាញ់ ។

ក្រាញ ក្រាញ់ ខ្នាញ់ ខ្លាញ់ ប្រាញ ឆ្ងាញ់ ជ្រួញ

ឈ្លួញ ត្បាញ ត្រួញ ឆ្នេញ ផ្អាញ់ ព្រួញ ភ្លើញ ម្រេញ

ម្សាញ់ ស្នោញ ក្រញាញ់ ប្រដេញ សំណាញ់ ស្រឡាញ់



គេទិញខ្លាញ់ត្រី ពីក្រុងភ្នំពេញ។

សំឡាញ់បីបង់ត្បាញហាឈើឆ្នេញ ។ សំពៅនេះចេញទៅ

ព្រែកគ(រ)វិញ ។ ខ្ញុំឃើញត្រីឆ្ពោប្រដេញគ្នា ។ ពួក្រាញ់

ទៅបង់សំណាញ់ ។ ឈ្លួញនេះជួញចំណេញក្នុងផ្ទ

ម្សាញ់ ។ បីម៉ាញទិញខោឡាញ់ថ្មី ។

## មេរៀនទី ៤០

អន អណ អន់ អាន អាន់

អ៊ន អ៊ន់ អ៊ាន អ៊ាណ អ៊ាន់

កាន់ ខាន គុណ ឃុន ចាន ឆាន់ ជាន់ ឈាន ដាន ណែន តាន់ ទៀន ទាន ទាន់ ធុន បែន ពាន ពាន់ មាន់។

គ្ងាន ក្ដាន់ ខ្លួន ខ្វិន គ្មាន គ្រុន ប្រើន ឆ្អិន ឈ្មាន់ ប្លែន ទ្រាន់ ប្រាណ ប្លន់ ផ្លួន ព្រាន ភ្មែន ស្ពាន ស្ពាន់ ស្មៀន ស្វាន ។



បងបៅកែសានទៅ បាញ់ក្ដាន់បានបួន។ ទា បាន សន គ្រុន បាញ់ ពី ប៉ៃ លិន ។

បោ(វ) ប្លន់ តា ម៉ាន់ នៅ ស្គន់ ។ យើង លាង ខ្លួន ប្រាណ និង សាប៊ូ ។ ប៉ៃ យ៉ាន់ បាន សែន ព្រេន ពី ខែ មុន ។ គេ មិន ហ៊ាន បង ក្បួន នៅ ក្បៀ(វ) ស្ពាន ។ ពង មាន់ នេះ មិន ទាន់ ឆ្អិន ។

មេរៀនទី ៥១

# អម អាម អិម អឹម

កម គោម ចាម ញ ញិម ដើម តាម ទា ទឹម នោម
បៀម ផើម ពាម មើម យាម រើម លោម សៀម ហើម ។
ក្ដាម ក្រៀម ក្រោម ក្អម ខ្ទម ខ្ទឹម ខ្តើម ខ្លឹម ប្យាម
ប្រម ផ្អើម ត្រឹម ថ្គាម ប្លើម ទ្រោម ឆ្នឹម ប្លម ផ្ដើម ផ្អូម ផ្អែម
ព្រម ភ្លាម ម្រាម ម្អម ល្មម ស្គម ស្នាម ស្រោម ។



តា សោម សង់ ខ្ទម នៅ ក្រោម ដើម ក្រឡាញ់ ។ សំឡ បៃ តែម ផ្អូម ។ ជី ភោម ចាំ មេ រៀន វា ភ្លាម ។ ស្មៀន សែម មិន បេះ នៅ ស្ងៀម ។ នាង ពេន ថ្នម ប្អូន ពៅ ។ ជើង ពាន ស្តាត់ នេះ ជុះ ស្និម ។ ស្រោម ជើង នេះ ល្មម នឹង បី ឡម ។

## មេរៀនទី ៥២

អក=អខ=អឃ=អគ អក់ អាក=អាគ អាក់

អ៊ក=អ៊ខ=អ៊ឃ=អ៊គ អ៊ក់ អ៊ាក=អ៊ាគ អ៊ាក់



ខាក គោគ ង៉ោក បាក បាក់ ឆែក

ដុក ញាក់ ដែក តក់ បោក ទាក់ ឆាគ

ពួក ភាគ មុខ មេឃ រោគ សុខ ។

អ្នក=ឆាក់ ក្ងោក ក្លៀក ក្អែក ខ្វាក់ ខ្ទែក

ប្បូក ឆ្នុក ជ្រូក ឈ្លក់ ត្បក ប្ដុក ឈ្លាក់ ប្រាក់ ផ្កាក់ ផ្អក

ព្រែក ភ្នែក ម្នាក់ ស្បើក ល្អក់ ស្កក ស្នុក ស្បែក ស្លៀក ។

តា ម៉ក់ យក ប្បូក ទៅ បាក់ ត្រី ឆ្ដោ ។ ស្អែក បី ប៉ុក ភ្ញាក់ ពី ព្រឹក ទៅ ព្រែក កក់ ។ ក្មេង ណា ស្មោក គ្រោគ ច្រើន មាន រោគ ។ បែ សុក ភ្លក់ នំ គ្រក់ ។ ក្អែក បុះ ទៅ ផឹក ទឹក ប្ដុក ។ ពួក ឆេះ ស្លៀក ពាក់ ប្លែក ពី គេ ។ អ្នក ស្រុក រែក ឃ្លោក ទៅ លក់ ។ ខ្ញុំ ស្រក់ ទឹក ភ្នែក ស្រោក ។

## មេរៀនទី ៥៣

អត=អដ=អថ=អទ=អឌ អត់ អាត អាត់

អ៊ត=អ៊ដ=អ៊ថ=អ៊ទ=អ៊ឌ អ៊ត់ អ៊ាត អ៊ាត់



កាត កាត់ ខាត ខាត់ គាត់

ឃាត់ ងៀត ចាត់ ចោទ ឆោត

ជាត់ ដោត ទាត់ ញាត់ ញាទ

ពោត ភេទ មាឌ ប្រាកដ ។

ក្ដាត ក្នាត់ ខ្វាត់ ខ្ចិត ឃ្លាត

ប្រត់ ប្រូត ឆ្នោត ឆ្អែត ឈ្លួត ត្នោត ត្មាត ទ្រុឌ ប្រិត ប្លាត

ផ្ចិត ផ្សិត ព្រាត ភ្លាត់ ល្បាត ល្ហុត ស្លូត ស្នៀត ស្អាត

ស្បប សមុទ្រ គ្រុឌ ។

ត្មាតនេះស៊ីមិនទាន់ឆ្អែត ។ គេដាំដើមត្នោតជិតមាត់សមុទ្រ ។ ត្រីស្លាតមានជាតិជាងត្រីឈ្លាត ។ ប៊ីម៉ែតផ្ទៀតធ្វើបំពោទ ។ ពូឈឺស្បបលែងវិញឆ្នោតទៀត ។ នាងគាតហែកសំពត់ដីព្រាត់ខាត ។ គេដើ(រ)កាត់ព្រៃស្ងាត់ ។

## មេរៀនទី ៥៤

អប=អផ  អាប=អាផ  អប់  អាប់

អ៊ប=អ៊ផ  អ៊ាប=អ៊ាផ  អ៊ប់  អ៊ាប់

កាប កាប់ ខូប គេប បុប ញៀប ដាប ដាប់



តូប ទាប បី បាប់ ពូជ មុជ រោប សាជ លួប

វៀប សាប សាប់ ហួប ។

ក្លួប ក្បាប់ ក្រូប ក្រ

បួប ខ្ជួប ខ្មោប ខ្លាប ត្រេប

ឃ្លៀប ឃ្វិប ប្រាប់ ឈ្លប ត្រាប ប្ដើប ធ្មេប ប្រាជ្ញ ភ្លេប

ម្ដេប ម្រេប ល្វាប ល្អប ស្ដេប ស្នាប ស្រួប ស្អូប ។

គេ បាប ទឹក នឹង ស្នាប ។ បៃ ទូប ភ្លេប ស្រោប ដំណាំ ។

ល្វាប នេះ បង ខ្ញុំ ទៅ បេះ ក្រូប ឃ្វិប ។ ដី ទ្បាប ឈ្លប ស្រ

មោប ។ អាម៉ាប មិន នៅ ទី នេះ ព្រោះ វា ខ្លាប ឃ្មុំ ទិប ។

បូ(វ) កុំ លួប ក្ដួប គេ ។ ហេតុ ម្ដេច បាន ជា នាង ក្ដិប

ប្អូន ។ កុំ កាប់ ពោត នោះ គេ ទុក ផ្ញើ ពូជ ។

www.yerngshare.blogspot.com

## មេរៀនទី ៥៥

អប=អព=អភ អប់ អាប អាប់

អ៊ប=អ៊ព=អ៊ភ អ៊ប់ អ៊ាប អ៊ាប់

កាប កាប់ ខាប ខាប់ គាប ងាប់ ចាប ចាប់ ឆាប ឆាប់ ជួប ធូប បាប ផាប់ ពៀប ភាព រាប់ លោភ ។

ក្តិប ក្អែប ខ្ចប់ ខ្សឹប គ្រប់ ឃ្នាប ច្បាប់ ឆ្អាប ជ្រាប ត្រប់ ថ្កៀប ទ្រាប ធ្នាប់ ធ្លាប់ ប្រាប់ ផ្គាប់ ផ្អាប់ ព្រាប ម្ហូប ល្បប ស្ងាប ស្នប់ ស្រោប ស្លាប ។



ប្រអប់ស៊ីវិឡាតនេះគ្មានគ្រប ។ អ្នកធ្មប ចាប់ យកលាជបីក្តាប់ ។ ទា បានឈ(រ)ត្រៀប ត្រាក្នុងម្លប់ ។ ពូ ព្រាប លេប ថ្នាំ គ្រុន ពី(រ) គ្រាប់ ។ គេ ខ្សឹប ប្រាប់ ខ្ញុំ ថា តាក្លែប ស្លាប់ ។ អ្នក បំ កា(រ) ខ្ចប់ ម្ហូប ទៅ បរិភោគ ។ យើង ធ្លាប់ ខ្លាប ច្បាប់ ទំលាប់ ។

មេរៀនទី ៥៦

# អយ អាយ អ៊យ អ៊ាយ



កើយ គុយ ងាយ ចាយ ឆាយ ជួយ បំណាយ ទីទុយ បាភាយ ពពាយ ឆាយ ភួយ ឈួយ មួយរយ រលួយ ហើយ ឡើយ ។

ក្លាយ ខ្វាយ ខ្ចាយ ខ្សោយ ឆ្ងាយ ឆ្លើយ ជ្រាយ ជ្រោយ ឈ្លើយ ឈ្មើយ ត្រួយ ប្វាយ ឆ្លាយ ប្រាយ ផ្កាយ ផ្សាយ ព្រួយ ល្បោយ ល្វើយ ស្ពាយ ស្រួយ ។

យាយ ប្រាក់ ស្រាយ សំពាយ ។ ផ្ទះ មេ គយ នៅ ក្រោយ ផ្ទះ លោក ភួ ឈួយ ។ ខ្មួយ ពួន នៅ ក្រោម ខ្នើយ ។ ប្ដី គួយ ព្រួយ ព្រោះ ក្មួយ គាត់ ឈឺ ។ ខ្ញុំ ស្ដាយ ដោយ ពុំ បាន ទៅ ស្វាយ រៀង ជាមួយ នឹង ម្ដាយ ខ្ញុំ ។ លោក ចៅហ្វាយ ចាយ លុយ មិន ស្ដាយ សោះ ។

## មេរៀនទី ៥៧

## អវ អាវ អ៊វ អ៊ាវ



កែវ ខៀវ គាវ បែវ ឆៅវ ឆាវ ដាវ ជំទាវ ថែវ បាវ ផាវ រៀវ លាវ សាវម៉ាវ ហៅវ ហាវ ឡៀវ អាវ ។

ក្រៀវ ខ្វាវ ខ្វែវ ប្រាវ ជ្រាវ ត្រាវ ត្រូវ ប្លូវ ប្រាវ ផ្លូវ ផ្អាវ ព្រាវ ផ្សៀវ ភ្លាវ ស្លូវ ស្បូវ ស្រូវ ស្រៀវ ប្រដៀវ សាវក្ដោង ។

តាព្រាប ដកដាវស ផ្លាវ ។ នៅស្រុកលាវ គេដាំដើម សាវម៉ាវ ជាច្រើន ។ យាយកែវ ពាក់ កាវ តាំងពីក្មេង ។ គេផ្ទុក បាវស្រូវ ក្នុង ទូកប្លែ ។ ពូខៀវ ដើ(រ) តាម ផ្លូវរទេះ ទៅភូមិស្រយូវ ។ ជីពីវ ពាក់ អាវ មិនដាក់ឡេវ ។ ជំទាវភុំ ភ្ញាក់ មុន មាន់រងាវ

## មេរៀនទី ៥៨

# អល អល អាល អាល់ អឹល អឹល់ អ៊ឹល អ៊ឹល់

កាល កាល់ ខែល គាល់ បាល់ ជួល ដោល ទាល ទាល់ ធិល បោល ពេល មើល យោល វៀល វាល វាល់ ហាល ។

ក្រាល ខ្ជិល ខុល ខ្យល់ ឃ្វាល ប្រាល ផ្អៀល ធ្វើល ផ្ទែល ជ្រុល ឈ្មោល ថ្នាល ទ្រាល ផ្អោល ផ្អើល ព្រាល ព្រើល ភ្ជល់ ម្ជុល ស្គាល់ ស្លួល ស្រាល ។



យើង ត្រូវ ជំរះ ក្អែល រាល់ ថ្ងៃ ពីក្បាល រហូត ដល់ ចុង ជើង ។ លោក គ្រូ ខ្ជាល់ ព្រោះ ជី ប៉ុល វា ខ្ជិល ។ យាយ កែវ ពិសា ត្រាវ ទាល់តែ ស្កល់ ។ អ្នកស្រែ ខ្លះ មិន ដែល ស្គាល់ ត្រី ព្រួល ។ តា ក្រៀល ស៊ី ឈ្លួល ឃ្វាល ពពែ ។ ពូ ព្រិល ដេញ គោ ឈ្មោល ចូល ក្រោល ។ ផ្ដិល នេះ ស្រាល ស្ដើក ។

## មេរៀនទី ៥៩

អស អស់ អាស អាស់

អ៊ស អ៊ស់ អ៊ាស អ៊ាស់

កោស ខុស បាស បាស់ ដួស ឈូស ញើស ដួស ណាស់ ទោស បួស ពិស ពស់ មាស រើស សៀស វាស វាស់ សិស្ស ហួស ។



ក្រាស ក្លស់ ខ្ទាស់ ខ្មោស ខ្នាស ច្បាស់ ប្រាស ឆ្មាស ឆ្លាស់ ជ្រើស ឈ្លួស ត្រួស ហ្វាស ប្លស់ ទ្រើស ធ្មស់ ប្រោស ផ្លាស់ ព្រួស ភ្ញាស់ ម្ទេស ល្មើស ស្រាស់ ក្រដាស អំបោស រនាស់ ។

បីរស់ សរសេរ លើ ក្រដាស ក្រាស់ ។ យាយ ឡាប កោស ដូង និង ខ្មោស ។ តាសៀស មិន និយាយ ផ្ដេស ផ្ដាស ទេ ។ នាងសយ ឆ្លើយ ច្បាស់ ណាស់ ។ គេ ចាប់ ត្រីរ៉ស់ នៅ ក្នុង ស្រះ ។ ម្ដាយ ខ្ញុំ ជ្រើសរើស យកតែ ម្ទេស ស្រស់ ។

## មេរៀនទី ៦០

ពាក្យប្រកបនឹង (រ) តាមទំនងហាក់ដូចជាគ្មាន (រ) ទេ តែតាមអក្ខរាវិរុទ្ធ ពាក្យខ្លះត្រូវតែដាក់ (រ) ពីមុខ



បៃសៅ យួរត្រីផ្អើរ មក ពី ផ្សារ ។ នៅ សាលារៀន គ្រូតែរៀន គូរ គំនូរ ពីរ ដង ក្នុង មួយ អាទិត្យ ។ តាកែ ដើរ ក្នុង ច្បារ ឃ្លាំ មើល ផ្កាបា ។ បីម៉ៅ កាន់ ការងារ នេះយូរ ហើយ ។ គេរៀប ក្មេង ឲ្យ ឈរ ជា ពីរជួរ នៅ ក្បែរ សាលា ។ ទា មិន ចេះ ការ ពារ កូន វាទេ ។ ម្ដាយ ខ្ញុំ ពិ សា ពោត ស្ងោរ ជា មួយ នឹង ស្ករ ស ។ លោកគ្រូ សរសេរ ពាក្យ សួរ នៅ លើ ក្ដារ ខៀន ។

ភរ នៅ ហោរ ចោរ នៅ ជាង ។

---

អាទិត្យ (ម. ប. អា - ទិត)

## មេរៀនទី ៦១ (ស្រៈសំស្ក្រឹតឬបាលី)

ឥ ឦ ឧ ឩ ឫ ឬ ឭ ឮ ឯ ឰ ឱ ឳ



ឥត ឥសី ឥន្ទ្រ ឦសាន ឧកញ៉ា
ឧដុង្គ ឧត្តរ[1] ឧបមា ឧបាយ ឪទឹង
ឪពុក ឪម៉ាល់ ឪឡ្យ ឪឡឹក ឫកពា
ឫស្សី[1] ឬទេ រឭក ឯក ឯង ឯកឧត្តម[1]
ឱប ឱ្យ = ឲ្យ ឱកាស តាំងឱ ។

ខ្ញុំឮឪឡ្យយំនៅទិសឦសាន ។ លោកតា ឧក ឥត មានឱកាសទៅឧដុង្គសោះ ។ ឧកញ៉ា ឪ ឲ្យទៅទិញ ប្ដាំឥសីផ្សំស្រេច ។ ឪម៉ាល់ទិបក្បាលដីឯក ។ នៅប្រទេសខ្មែរគេដាំឪឡឹកគ្រប់ដំបន់ ។ ឧបាសកសែម ទៅដកទំពាំងឫស្សី ។ ឯងរឭកឪពុកឬទេ ។

---

[1] ឧត្តរ (ម. ថ. អុត - ដរ) ឫស្សី (ម. ថ. ឫស - សី) [1] ឧត្តម (ម. ថ. អ៊ុត - ដំ)

## មេរៀនទី ៦២ (ពាក្យពីរព្យាង្គតម្រួត)

កង្កែប (កង់ កែប) បង្កាត (បង់-កាត) អង្គុយ (អង់-គុយ) សង្ឃឹម (សង់-ឃឹម) បិញ្ចើម (បិញ-ចើម) ជញ្ជាំង (ជញ់-ជាំង) បញ្ញើ (ប័ញ-ញើ) អណ្ដើក (អណ់-ដើក) ប៉ុន្តែ (ប៉ុន-តែ) បន្ថែម (បន់-ថែម) កន្ទេល (កន់-ទេល) ដម្បូល=ដំបូល ទម្លាប់=ទំលាប់ បង្រៀន (បង-រៀន) ពន្យល់ (ពន់-យល់) ទន្សាយ (ទន់-សាយ) ជង្រុក (ជង់-រុក) បង្វិល (បង-វិល) បង្ហាត់ (បង់-ហាត់) បង្អែម (បង់-អែម) ។



គេនាំគ្នាជញ្ជូនបង្កង់ដាក់ក្រោមផ្ទះ ។ ជង្កៅ មៅ បង្ខំកូនឲ្យរៀនមេទន្ទេញ ។ តាពេញ ស្ពាយសម្ពាយដើរកាត់មុខបន្ទាយ ។ ម្ដាយខ្ញុំដាក់បង្កៀងលើកន្ទេលផ្ដៅ ។ បែ សំ ទៅទិញបង្កងមកធ្វើបង្ហាន់លោក ។ លោកគ្រូបង្គាប់ចៅកៅឲ្យអង្គុយជិតបង្អួច ។

# ភាគទី ២

## ១- សាលារៀនខ្ញុំ

សាលារៀនខ្ញុំសង់នៅកណ្ដាលទីធ្លាមួយធំ មានដាំដើមឈើ



ព័ទ្ធជុំវិញជារបង ។ នៅខាងមុខសាលាមានសួនប្បារពីរដ៏មានផ្កា មានពណ៌ ស ស៊ីជំពូ លឿង ស្វាយ បម្រះគ្នា ។ សាលានោះ សង់អំពីឈើ ប្រក់ក្បឿង មានកន្លែងរៀនបីធំទូលាយ ។ កន្លែងរៀននីមួយ ៗ មានទ្វារនឹងបង្អួចសម្រាប់ឲ្យខ្យល់នឹងពន្លឺចេញចូលបានស្រួល ។

សាលារៀនខ្ញុំសមណាស់ ហើយល្អជាងផ្ទះឯទៀតទាំងអស់ដែលនៅក្នុងភូមិខ្ញុំ ។

---

ព័ទ្ធ (មថ. ព័ត) ។ ពណ៌ (ម.ថ. ព័រ) ។



## ២– ពេលចូលរៀន

ម៉ោងប្រាំបី ជួងសាលារោទ៍ឮគ្រលួច ។ ពួកយើងជាសិស្សទាំងអស់គ្នាឈប់ប្រដេញគ្នាលេង ហើយរត់មកឈរតំរៀបគ្នាជាជួរ នៅមុខថ្នាក់រៀនខ្លួន ។ លោកគ្រូដើរតាមបន្ទោះជួរ ពិនិត្យមើលដៃ មុខ និងសំលៀកបំពាក់យើងគ្រប់គ្នា ហើយលោកមានប្រសាសន៍ថា "សិស្សសាលាត្រូវតែថែទាំខ្លួនប្រាណឲ្យស្អាត" ។ ពិនិត្យរួចហើយ លោកគ្រូលើកដៃធ្វើជាសញ្ញាប្រាប់យើង ឲ្យចូលក្នុងកន្លែងរៀន ។ យើងដើរសំដៅទៅកន្លែងរៀនខ្លួន ដោយស្ងៀមស្ងាត់ ។

---

រោទ៍ (ម. ឋ. រោ) ។ [illegible] ។ [illegible] (ម. ឋ. សាស) ។



## ៣_ កន្លែងរៀនខ្ញុំ

ថ្នាក់ដែលខ្ញុំរៀន ឈ្មោះថ្នាក់កុមារដ្ឋាន ។ បណ្ដោយមានប្រវែងប្រាំពីរម៉ែត្រ ទទឹងប្រាំមួយម៉ែត្រ ។ ទ្វារនឹងបង្អួចលាបពណ៌បៃតងខ្ចី ។ នៅក្នុងកន្លែងរៀនខ្ញុំ តុគ្រូដាក់លើក្ដារកំណល់ជិតក្ដារខៀន ។ នៅមុខតុគ្រូ មានតុសិស្សពីរជួរ។ នៅក្បែរជញ្ជាំង ខាងក្រោយតុសិស្ស មានទូកញ្ចក់មួយធំខ្ពស់ភ្លឺរលោង គឺនៅក្នុងទូនោះហើយ ដែលលោកគ្រូខ្ញុំដាក់របស់គ្រប់មុខ សំរាប់បង្រៀនសិស្ស ។

កន្លែងរៀនខ្ញុំស្អាតណាស់ ហើយសប្បាយផង ។

---

ប្រាំពីរ គេថា (ប្រាំពិល) តាមសំដីអ្នកស្រុកដែលធ្លាប់ប្រើមកហើយ ។

www.yerngshare.blogspot.com

## ៤– ប្រដាប់ប្រដារបស់សិស្ស




ប្រដាប់ប្រដាសិស្ស គឺសៀវភៅសរសេរ សៀវភៅមើល ដងប៉ាកកា ខ្មៅដៃ បន្ទាត់ ជ័រលុប ក្រដាសផ្ដិត ដបទឹកខ្មៅ ។ បើគ្មានក្រដាសផ្ដិតទេ សៀវភៅសរសេរមុខតែមិនស្អាតឡើយ ។ ខ្មៅដៃសំរាប់គូរគំនូរ ។ ជ័រលុបសំរាប់លុបអក្សរឬគំនូរដែលគូរពុំទាន់ត្រឹមត្រូវ ។ ដបទឹកខ្មៅត្រូវបុកឲ្យជិត ដើម្បីកុំឲ្យកំពប់ នឹងកុំឲ្យធូលីចូលផង ។

សិស្សត្រូវមានប្រដាប់ទាំងអស់នេះ ហើយត្រូវថែរក្សាកុំឲ្យបាត់បង់ឡើយ ។ ត្រូវប្រយ័ត្នកុំឲ្យធ្លាក់ខ្មៅដៃ ពីព្រោះវាបាក់បណ្ដាលនៅខាងក្នុង ។

---

ប្រយ័ត្ន (ម. ថ. ប្រ - ហ៊ត់)



## ៥_ សិស្សល្អ

នារីជាសិស្សល្អ មករៀនរាល់ថ្ងៃពុំដែលឈប់ ហើយទៀងពេលវេលាផង ។ សំលៀកបំពាក់សិស្សនេះស្អាតជាដរាប ។ នារីចាំមេទន្ទេញគ្រប់មុខ ។ កិច្ចការដែលគ្រូដាក់ឲ្យទៅធ្វើឯផ្ទះទាំងប៉ុន្មាន នារីធ្វើទាំងអស់ ។ នៅក្នុងកន្លែងរៀន នារីមិនហ៊ានប្រលែងលេងនឹងសិស្សដែលអង្គុយជិតខាងទេ នាងប្រុងប្រយ័ត្នស្តាប់គ្រូពន្យល់ ។ សេចក្តីដែលគ្រូពន្យល់ទាំងអម្បាលម៉ាន នាងចាំទាំងអស់ ។ នារីជាក្មេងឧស្សាហ៍ ហើយឆ្លាតផង ។ គ្រូស្រឡាញ់សិស្សនេះណាស់ ដល់ចុងឆ្នាំ នារីបានរង្វាន់ ហើយបានឡើងថ្នាក់ផង ។

www.yerngshare.blogspot.com

---

ឧស្សាហ៍ (ម.ជ. អ៊ុស សា)



## ៦– ពេលចេញលេង

ម៉ោងប្រាំបួនម្ភៃប្រាំនាទី ខ្ញុំឮស្នូរជួងរោទ៍សម្លេងយ៉ាងស្រួយ គឺដល់ពេលចេញលេង ។ គ្រូគ្រប់ថ្នាក់បើកឲ្យសិស្សចេញទាំងអស់ ។ ខ្ញុំរត់លេងយ៉ាងសប្បាយក្នុងទីធ្លា ។ ខ្ញុំឮស្នូរមាត់សិស្សជជែកគ្នាអ៊ូអរអឺងកង ។ ខ្លះសើច ខ្លះហៅកញ្ជ្រៀវយ៉ាងខ្លាំង ខ្លះលេងប្រដេញគ្នា ខ្លះទាត់សី ខ្លះទៀតលោតអន្ទាក់ខ្សែ ។ សិស្សធំ ៗ ខ្លះឈរផ្អែកក្រោមដើមឈើមើលក្មេងតូច ៗ លេង ។

លោកគ្រូទាំងឡាយដើរទៅដើរមកត្រួតត្រាមើលសិស្ស ។

# ៣_ សំឡាញ់ខ្ញុំ



នៅក្នុងថ្នាក់ខ្ញុំ ខ្ញុំមានសំឡាញ់ម្នាក់ឈ្មោះណារ៉ាឌី ។ វាបងខ្ញុំពីរឆ្នាំ ។ វាជាសិស្សប្រកបដោយកិរិយាមារយាទល្អប្រពៃព្រមទាំងមានប្រាជ្ញាវៃផង ។ វាចេះជួយធុរៈក្មេងណាដែលតូចជាងវា ។ ដើរតាមផ្លូវ វាមើលខុសត្រូវ ហើយជួយការពារក្មេងតូច ៗ មិនឲ្យមានគ្រោះដោយយានជំនិះផ្សេង ៗ ។ កាលណាវាបានចំណីឆ្ងាញ់បរិភោគ វាចែករំលែកឲ្យខ្ញុំ ឬឲ្យក្មេងណាដែលជាកូនអ្នកក្រលំបាក ។

សិស្សទាំងអស់ចូលចិត្តលេងជាមួយនឹងណារ៉ាឌីណាស់ ។



## ៨— គ្រូខ្ញុំ

គ្រូខ្ញុំឈ្មោះលោកសារី មាឌធំមាំខ្ពស់ សម្លេងគ្រលរ ។ លោកមកដល់សាលារៀន មុនម៉ោងជាដរាប ។ សំលៀកបំពាក់លោកស្អាតណាស់ ពុំដែលប្រាក់ផ្ដត់ទេ ។ លោកបង្រៀនសិស្សដោយយកចិត្តទុកដាក់ ហើយមានចិត្តសន្ដោសផង ។ លោកធ្វើទោសតែសិស្សណា ដែលខ្ជិលមិនចាំមេរៀន ។ គ្រូខ្ញុំសុចរិតណាស់ លោកសរសើរ ហើយឲ្យរង្វាន់ចំពោះសិស្សណាដែលឧស្សាហ៍រៀនសូត្រ ។

ខ្ញុំស្រឡាញ់គ្រូខ្ញុំណាស់ ហើយខ្ញុំមិនភ្លេចគុណលោកទេ ។

## ៩– ខ្លួនមនុស្ស



លោកគ្រូឲ្យណារ៉ាំឌី ទៅឈរនៅមុខសិស្សទាំងអស់គ្នា ។ លោកមានប្រសាសន៍ថា យើងសង្កេតមើលខ្លួនណារ៉ាំឌីតើមានអ្វីខ្លះ ។ នៅខាងលើ ហៅថាក្បាល បុះមកគឺដងខ្លួន ក្រៅអំពីចំណែកនោះ ខាងលើមានដៃ ខាងក្រោមគឺជើង ។ ដៃជើងរួមទាំងអស់ទៅ គេឲ្យឈ្មោះថា អវយវៈ ។

លោកគ្រូសួរទៅណារ៉ាំឌីថា ប្រសិនបើគេកាត់ក្បាលហើយនិងអវយវៈចេញ តើនៅសល់អ្វី ? ណារ៉ាំឌីញញឹមហើយឆ្លើយថា សូមជំរាបលោកគ្រូ បើដូច្នោះនៅសល់តែដងខ្លួនទេ ។

---

*ប្រសាសន៍* (ម. ថ. ប្រ - សាស)

# ១០– អំពីក្បាល



មនុស្សយើងមានមុខ មាត់មិនដូចគ្នាទេ ។ ក្បាលសាលីមូលសំប៉ែតមុខប្រាបូញ ។ សក់នាងណារីខ្មៅរលោងវែង ហើយរួញ ៗ ។ ចិញ្ចើមគូកខ្ញុំក្រាស់ ភ្នែកវាក្រឡោត ។ ច្រមុះបងប្រុសនាងណារីស្រួចហើយកោង ។ មាត់ណារីនីតូច បបូរមាត់ស្តើង ។ នៅក្នុងមាត់មានធ្មេញ ហើយនឹងអណ្តាត ។ ធ្មេញម្តាយខ្ញុំស ហើយដុះតំរៀបគ្នាជាជួរល្អណាស់ ។ បង្កាន់ពុកខ្ញុំស្រួច ស្នឹកត្រចៀកគាត់ធំហើយក្រាស់ ។

មនុស្សយើងស្គាល់គ្នាទៅវិញទៅមកដោយសារមុខ ។

# ១១_ អំពីដៃ



យើងម្នាក់ ៗ មានដៃពីរ ។ ដៃមួយ ៗ មានដើមដៃ កំភួនដៃ និងចុងដៃ ។ ត្រង់ណាដែលហៅថាកំភួនដៃ ? គឺតាំងពីកែងដៃរហូតទៅដល់កដៃ ។ ដៃនីមួយ ៗ មានម្រាមប្រាំ ដៃទាំងពីរមានម្រាមដប់ ។ នៅចុងម្រាមមានក្រចក ។ ដៃជាប្រដាប់មួយសំខាន់របស់មនុស្ស ។ បើគ្មានដៃ យើងនឹងរកស៊ីធ្វើការអ្វីមិនបានឡើយ ។ មនុស្សណាដែលកំបុតដៃ ធ្វើការអ្វីពុំបាន មនុស្សនោះនឹងរងទុក្ខវេទនាអស់មួយជីវិត ។

យើងត្រូវកាត់ក្រចកដៃជារឿយ ៗ ។

## ១២_ អំពីជើង



យើងមានជើងពីរ ។ ជើងជាប់នឹងដងខ្លួនត្រង់ត្រគាក ។ ជើងម្ខាង ៗ មានភ្លៅ ជង្គង់ កំភួនជើង និងបាតជើង ។ នៅចុងជើងមានម្រាមប្រាំ ។ នៅចុងម្រាមមានក្រចករឹងជាងក្រចកដៃ ។ យើងដើរ រត់ លោត នឹងជើង ។ ដូច្នេះ ជើងក៏ដូចជាដៃដែរ គឺជាប្រដាប់សំខាន់របស់មនុស្សយើង ។ មនុស្សណាដែលបាក់ជើងស្វិតជើងដើរពុំបាន ហៅថា មនុស្សខ្វិន ។

យើងត្រូវប្រយ័ត្នថែដៃជើងរបស់យើងកុំឲ្យបាក់ ។

## ១៣_ សាច់ដុំ

នៅជិតសាលារៀនខ្ញុំ មាន



ជាងឈើម្នាក់ឈ្មោះម៉ម ។ ពូម៉មមានមាឌធំ ហើយមាំផង ។ កាលណាគាត់កាន់ដែកឈូស ៗឈើ ខ្ញុំឃើញដើមដៃគាត់ ឡើងប៉ោងដូចគេសប់ ។ ភ្លៅនឹងកំភួនជើងគាត់មើលទៅឃើញតែសាច់ដុំ ។ គាត់ឈរឈូសឈើ ធ្វើព្រងើយដូចជាគ្មានអស់កម្លាំងសោះ ។ ខ្ញុំសួរគាត់ថា "ពូ! ហេតុម្ដេចក៏ដៃជើងខ្ញុំមិនដូចដៃជើងពូ?" ។ គាត់ឆ្លើយថា: "បើក្មួយចង់ឲ្យមានសាច់ប្រើនដូចពូ ប្អូនក្មួយកុំស្អប់ខ្ពើមការហាត់កម្ម" ។



## ១៤– វិធីហាត់ប្រាណ

សិស្សត្រូវហាត់ប្រាណរាល់ថ្ងៃ នៅវេលាល្ងាចដែលចេញពីរៀន ។ បើលោកគ្រូបង្គាប់ឲ្យលើកដៃ ឬលើកជើងដូចម្ដេចត្រូវតែធ្វើតាម ។ យើងមិនត្រូវរត់ពួនគេបវៀរៈទៅលេងឯណោះឯណោះទេ ។ វិធីហាត់ប្រាណមិនគ្រាន់តែលើកដៃជើងប៉ុណ្ណោះទេ នៅមានលេងប្រដេញគ្នា រត់លោតយ៉ាងសប្បាយ នាំឲ្យបែកញើស ។ ធ្វើយ៉ាងនេះ យើងអស់កម្លាំងបន្តិច តែយើងនឹងបរិភោគបានច្រើន ។

វិធីហាត់ប្រាណ នាំឲ្យមានកម្លាំងកំហែង មានសាច់ឈាមថ្លាល្អ ។



## ១៥– ការសំអាតខ្លួនប្រាណ

រាល់ព្រឹកណារ៉ាឌីភ្ញាក់ពីព្រលឹម ។ វាយកសៀវភៅមកមើលមេរៀនរបស់វាឡើងវិញ មួយស្របក់ទើបវាដើរទៅក្នុងបន្ទប់ទឹក ។ វាយកសាប៊ូមកលាងដៃ ដុសធ្មេញ រួចវាងូតទឹក ។ វាដុសលាងខ្លួនប្រាណ ជើងដៃ នឹងសាប៊ូពុំដែលខានទេ ។ វាជូតខ្លួនវានឹងកន្សែងពោះគោ រួចវាឡើងទៅលើផ្ទះវិញ ។ វាឆ្លុះកញ្ចក់ សិតសក់នឹងក្រាសយ៉ាងស្អាត ។

ណារ៉ាឌីស្អាតជានិច្ច ។ វាមិនដែលមានកមរមាស់ទេ ។



## ១៦- ណារ៉ាឌីស្លៀកពាក់

ណារ៉ាឌីសំអាតខ្លួនរួចហើយ វាមុំមាទៅយកខោខ្លីមកស្លៀក ។ ដើម្បីកុំឲ្យរបូតខោ វាក្រវាត់បង្កេះវានឹងខ្សែក្រវាត់ស្បែកមួយ ដែលវាប្រើយូរណាស់មកហើយ ។ ស្លៀកពាក់រួចស្រេច ទើបណារ៉ាឌីស្រស់ស្រូបអាហារ ។ វាប្រមូលប្រដាប់ប្រដាវាទៅសាលារៀន ។

ណារ៉ាឌីពាក់មួកសំបុក សំរាប់ការពារក្បាលវា នឹងកំដៅព្រះអាទិត្យ ។ វាពាក់ស្បែកជើងឈើប្រយោជន៍កុំឲ្យឈឺជើងវា ក្នុងវេលាដែលដើរតាមផ្លូវ ។

## ១៧– អំពីសំលៀកបំពាក់



លោកគ្រូយើងស្លៀកខោបារាំងជើងវែង ពាក់អាវបើកក ហើយមានបង់ "ក្រាវ៉ាត់" ផង ។ លោកពាក់ស្រោមជើងស និងស្បែកជើងខ្មៅ ។ បើលោកមានការដើរទៅក្នុងផ្លាសាលា លោកយកម្ហួកសមកពាក់ ។

នៅក្នុងផ្ទះ លោកផ្លាស់ខោអាវដែលរាយឈ្មោះខាងលើនេះចេញ ។ លោកយកសារុងមកស្លៀក ហើយពាក់អាវទ្រទាប់ស្ដើង ។ ក្នុងផ្ទះលោកមិនដើរជើងទទេទេ លោកពាក់ស្បែកជើងផ្ទាត់ ។



## ១៨- អំពីសំលៀកបំពាក់ខ្មែរ

ថ្ងៃនេះមានបុណ្យមួយនៅក្នុងវត្ត ។ អ្នកស្រុកស្រែបញ្ចេញសំលៀកបំពាក់យ៉ាងល្អ ៗ ។ ប្រុស ៗ ស្លៀកសំពត់ផាមួងចងក្បិន ពាក់អាវកត្រង់ ដាក់ខ្សែរទង់ហ្វា ។ ក្មេងស្រី ៗ ស្លៀកហូល ពណ៌ស្រស់ ហើយពាក់អាវបំពង់ព្រៃ ពណ៌ ខៀវ បៃតង ផ្កាត្របែក ផ្កាឈូក ។ ចាស់ ៗ ស្លៀកខៀនពាក់អាវសខ្លី ហើយបង់ក្រមា ។

អ្នកមានពាក់ទំហូដាំពេជ្រ បន្តោងក ខ្សែដៃ ចិញ្ចៀនអង្កាំមាស ។ អ្នកខ្លះមាន[illegible]ដៃផង ។



## ១៩– អំពីផ្ទះខ្មែរ

រាល់ថ្ងៃ ដល់ពេលចេញពីសាលារៀន ខ្ញុំត្រឡប់ទៅផ្ទះខ្ញុំ ។ ផ្ទះខ្ញុំនៅក្រោយផ្ទះលោកមេឃុំ ។ ផ្ទះខ្ញុំជាផ្ទះខ្មែរបុរាណ សង់ពីឈើខ្ពស់ពីដី ប្រក់ក្បឿងក្រហម ជញ្ជាំងក្តារ ។ ពីមុខគេឃើញទ្វារមួយ បង្អួចពីរ ។ ជណ្តើរធ្វើអំពីឈើកកោះ ហើយមានបង្កាន់ដៃផង ។

ផ្ទះខ្ញុំសមណាស់ តែចាស់បន្តិចទៅហើយ ។ ដល់កាលណាខ្ញុំធំ ខ្ញុំខំសន្សំប្រាក់កាស ដើម្បីនឹងសង់ផ្ទះថ្មីយ៉ាងល្អ ។



## ២០– អំពីផ្ទះខ្មែរ (គ)

ផ្ទះខ្ញុំមានបីល្វែង ។ នៅល្វែងកណ្ដាល មានទ្បប់ទ្បៀមួយ ។ បំណែកខាងមុខទ្បប់ទ្បៀនេះ ទុកសម្រាប់ទទួលភ្ញៀវ។ នៅកន្លែងនេះ មានក្ដារជើងតាងនួនមួយ តុបេងមួយ ហើយនឹងកៅអីស្រទ្បាបួន ។ នៅលើជញ្ជាំង គេឃើញមាននាទ្បិកានិងរូបថត ។ ខាងក្រោយទ្បប់ទ្បៀ ជាកន្លែងបរិភោគអាហារ ។ ផ្ទះបាយនៅខាងក្រោយផ្ទះធំ ។

នៅក្នុងផ្ទះខ្ញុំ ត្រជាក់ណាស់ ឪពុកម្ដាយបងប្អូនខ្ញុំនៅបានសេចក្ដីសុខសប្បាយរៀងរហូតដល់សព្វថ្ងៃ ។



## ២១– អំពីគ្រួសារខ្ញុំ

ឪពុកខ្ញុំធ្វើស្រែផង ធ្វើចំការផង ។ គាត់នឿយលំបាកណាស់ ។ ម្ដាយខ្ញុំតុបតែងផ្ទះ ហើយមើលថែរក្សាកូនតូចៗ ។ គាត់ព្រួយបារម្ភជានិច្ច ។ បងស្រីខ្ញុំធ្វើម្ហូបឲ្យគ្រួសារបរិភោគរាល់ថ្ងៃ ។ គាត់បោក លាង ដេរ ប៉ះ សំលៀកបំពាក់របស់យើងទាំងអស់គ្នា ។ ឯចំណែកខាងខ្ញុំ ខ្ញុំទៅរៀនឯសាលា ។

ខ្ញុំខំរៀនសូត្រឲ្យបានចេះដឹង ហើយឲ្យឪពុកម្ដាយសប្បាយចិត្ត ។

## ២២_ ជីតាខ្ញុំ



ជីតាខ្ញុំ អាយុប៉ែតសិប ពីរឆ្នាំ ។ សក់គាត់ស្កូវព្រោង ខ្នងកោង ស្បែកជ្រីវជ្រួញ ថ្ពាល់ស្រូង មាត់គ្របុប ។ គាត់ដើរបាន ដោយទប់នឹង ឈើច្រត់ ។ គាត់ធ្វើការធ្ងន់ មិនបានទេ ។ គាត់នៅផ្ទះមើលថែទាំប្អូនខ្ញុំ ។

ជីតាខ្ញុំ តែងនិទានរឿងព្រេងឲ្យខ្ញុំស្ដាប់ ។ គាត់និយាយ ប្រាប់ខ្ញុំជារឿយ ៗ អំពីហេតុភេទដែលកើតឡើង កាលគាត់នៅ ពីក្មេង ។ គាត់ទូន្មានខ្ញុំជាញឹកញយ ឲ្យខ្ញុំបានប្រកបដោយ គន្លងច្បាប់ ។



## ២៣ – ពេលបរិភោគ

ឥឡូវនេះ ថ្ងៃត្រង់ហើយ គឺជាពេលទទួលទានបាយ ។ បងស្រីខ្ញុំគាត់លើកជាសម្លបមក មានសំឡត្រីជៀន អន្លក់ ទឹកគ្រឿង ។ ខ្ញុំជញ្ជូនចាន ហើយនឹងក្លាំដែលបងស្រីខ្ញុំដាក់បាយ។

ក្រុមញាតិរបស់ខ្ញុំអង្គុយជុំវិញជាសម្លប ។ ម្នាក់ៗ មានចានបាយមួយដាក់ពីមុខ ។ ឪពុកខ្ញុំបាច់អាហារនឹងបង្កើះ ។ យើងរាល់គ្នាបាច់នឹងដៃ ហើយយកស្លាបព្រាដួសសំឡ ។

បងប្អូនខ្ញុំ នឹងខ្ញុំបរិភោគដោយស្ងៀមស្ងាត់ ។




## ២៤_ អំពីសត្វ

មានសត្វច្រើនដែលនៅជិតយើង ។ គោអូសរទេះ ។ ក្របីទាញនង្គ័ល ។ គេប្រើសេះជាជំនិះ ។ ជ្រូកយើងយកសាប់នឹងខ្លាញ់វា ។ មាន់-ទាយើងយកពងនឹងសាច់ ។ ឆ្កែបែរក្សាផ្ទះសំបែងទាំងយប់ទាំងថ្ងៃ ។ ឆ្មាចាប់កណ្ដុរដែលជាសត្វចង្រៃ ។

សត្វដែលគេចិញ្ចឹមទាំងនេះ មានប្រយោជន៍ណាស់ ។ យើងត្រូវបីប៉ុនបំណាំអាហារ ហើយមិនត្រូវធ្វើបាបវាឡើយ ។

នៅក្នុងផ្ទះយើង មានសត្វខ្លះ ដែលជាសត្រូវនឹងយើងដូចជាមូសហើយនឹងសង្កើច ។

## ២៥– ឆ្កែខ្ញុំ



ឆ្កែខ្ញុំពូជឆ្កែខ្មែរ ។ មាឌវាធំល្មម ។ រោមវាខ្លីហើយខ្មៅ ។ វាមានពពាលសនៅលើក្បាល ។ ស្លឹកត្រចៀកវាបាក់ ។ កន្ទុយវាកំបុត ។

កាលណាខ្ញុំមកពីសាលារៀន វារត់ទៅទទួលខ្ញុំ ។ វាលិទ្ធជើងដៃខ្ញុំ ហើយវាបក់កន្ទុយផង ដូចជាវាបង់សួរសុខទុក្ខរបស់ខ្ញុំ ។ កាលណាខ្ញុំដើរទៅលេងនៅទីណា វាទៅតាមខ្ញុំ ។

ឆ្កែខ្ញុំមិនកាចទេ ។ វាគ្រាន់តែព្រូស តែវាមិនខាំទេ ។



## ២៦– អំពីក្របី

អ្នកនៅជិតខាងខ្ញុំ មានក្របីមួយនឹម ។ ក្របីទាំងពីរនេះដូចគ្នាបេះបិទ ។ មាឌវាធំមាំ ហើយខ្ពស់ជាងគោ ។ សម្បុរវាប្រផេះ ។ ស្នែងវាវែង កោងខុបរកគ្នា ។

សត្វនេះចូលចិត្តទឹកភក់ជាងកំដៅព្រះអាទិត្យ ។ ហេតុនេះបានជាអ្នកស្រែច្រើនប្រើក្របីឲ្យទាញនង្គ័ល ឬរនាស់ ។

ក្នុងពេលក្ដៅ វាដេកត្រាំទឹក ឬត្រាំភក់ ទំពាអៀងបណ្ដើរ ។

ក្របីជាសត្វបំរើ ស្លូតណាស់ ហើយខ្លាំងផង ។



## ២៧- អំពីភូមិខ្ញុំ

ខ្ញុំនៅភូមិសំរោង ។ ភូមិនេះតូចទេ នៅជិតមាត់ស្ទឹង ។ នៅក្នុងភូមិខ្ញុំ មានខ្មែរ-ចិន-យួន ។ ខ្មែរធ្វើស្រែ ឬចំការ ទីលំនៅច្រើនធ្វើអំពីឈើ ខ្ពស់ពីដី ។ ចិន ជា អ្នក ជំនួញ ហើយធ្វើផ្ទះទាបនឹងដីនៅជិតថ្នល់ ។ យួនច្រើនរកស៊ីនេសាទត្រី ហើយធ្វើផ្ទះសម្បែងនៅក្បែរមាត់ប្រាំង ។

អ្នកស្រុកភូមិខ្ញុំ ច្រើនតែមនុស្សត្រឹមត្រូវ ។ គេមិនឈ្លោះប្រកែកគ្នាទេ ។ គេគិតតែបបួលគ្នាធ្វើការរកស៊ី ។



## ២៨- ផ្ទះលក់ទំនិញ

នៅក្នុងភូមិខ្ញុំ មានផ្ទះលក់ទំនិញច្រើន ។ ផ្ទះពូសំមាន មនុស្សចេញចូលកុះករជាងគេ ។

នៅខាងមុខ គេឃើញកញ្ជើ សណ្ដែក មីសួ ត្រីងៀត ត្រីឆ្អើ(រ)ខ្ទឹមបារាំង ខ្ទឹមស ដាក់តំរៀបគ្នា ។ នៅខាងក្នុងជិតជញ្ជាំង មានទូកញ្ចក់ពីរ ។ នៅថ្នាក់លើ គេរៀបសំពត់ ខោអាវ ដបទឹកអប់ ដបថ្នាំ ។ នៅថ្នាក់ក្រោម គេឃើញមានដបស្រា ដប"លីម៉ូណាត" ប្រអប់ត្រី ។



## ២៩– អំពីផ្សារ

ផ្សារសង់នៅចំកណ្តាលភូមិ ហើយជិតមាត់ស្ទឹង ។ ផលដំណាំទាំងប៉ុន្មានរបស់អ្នកស្រុក មូលទៅនៅតែងផ្សារ ។ គេគរបន្លែលើរាន ហើយដាក់ផ្លែឈើក្នុងល្អី ។ គេរៀបត្រីនៅលើកំណាត់កន្ទេលដែលក្រាលលើដី ។ មាន់ ទា ស្រែកកញ្ច្រោលនៅក្នុងទ្រុង ដែលគេធ្វើពីឫស្សី ។ គេដាក់សាច់គោ សាច់ជ្រូកនៅលើតុឈើ ។ អ្នកទិញដើរទៅដើរមករកទិញអីវ៉ាន់ ។ នៅផ្សារគេឮតែសូរមាត់អ្នកលក់នឹងអ្នកទិញ ។

 



## ៣០_ អំពីជាងឈើ

ពូម៉ក់កំពុងតែធ្វើហិបមួយ ។ គាត់យកក្តារមួយសន្លឹកមកអារកាត់ជាកំណាត់ៗ ។ គាត់ឈូសកំណាត់ក្តារនេះយ៉ាងស្អាត ហើយគាត់វាយភ្ជាប់គ្នានឹងដែកគោល ធ្វើបាតហិប ។ គាត់វាយក្តារជុំវិញបាតនេះរួចហើយ គាត់ធ្វើគ្រប ។

ពូម៉ក់មិនធ្វើតែហិបទេ ។ គាត់ធ្វើ តុ ទូ ជើងម៉ា កៅអី ដែរ ។ នៅក្នុងរោងគាត់ គេឃើញតែកំទេចឈើ អាចម៍រណារ ហើយនិងអាចម៍ដែកឈូស ។



## ៣១– អំពីជាងដែក

កាលពីថ្ងៃអាទិត្យដែលកន្លងទៅហើយនោះ ខ្ញុំយកដែកមួយដុំទៅឲ្យជាងគ្រួបធ្វើកាំបិត ។ គាត់កំពុងតែដុតដែកមួយបន្ទះ ។ លុះដែកនេះឡើងក្រហម គាត់ចាប់ដែកនេះនឹងដង្កៀបមួយវែង គាត់ដាក់ទៅលើដែកទ្រនាប់ រួចគាត់ដំនឹងញញួរមួយធំ ។ ជាងគ្រួបគាត់ធ្វើ កាំបិត ពូថៅ ចប ។

នៅកន្លែងនេះ តាំងពីព្រលឹមលុះដល់ព្រលប់ គេឮតែសូរញញួរដូចជាពីរោះដែរ ។



## ៣២– អំពីវត្តនៅក្នុងភូមិខ្ញុំ

ម្ដាយខ្ញុំគាត់ទៅវត្តរាល់តែថ្ងៃសីល ។ វត្តនេះនៅខាងត្បូងភូមិលើដីទួល ។ នៅខាងជើងព្រះវិហារ គេឃើញកុដិលោកគ្រូសង្ឃរាជហើយនឹងសាលាឆាន់ ។ ស្ដូបលោកបរិសទ្យនៅខាងក្រោយព្រះវិហារ ។ ស្រះពីរនៅខាងមុខព្រះវិហារមានទឹកថ្លាឈ្វេង ហើយមានឈូកស ក្រហម ដុះចម្រុះគ្នា ។ នៅជិតស្រះ ខាងជើងក្បែរថ្នល់ មានសាលាសំណាក់មួយ ។



## ៣៣– អំពីដើមឈើ

នៅក្នុងធ្លាវត្តមានដើមឈើជាច្រើន គឺដើម ពោធិ៍ ដើមដូង ដើមត្នោត ដើមស្វាយ ។ ដើមស្វាយមួយនោះ ចាស់ណាស់ ហើយ ឫសវាចាក់ជ្រែកទៅក្នុងដីគ្រប់ទិស ។ ដើមវាធំមូល តែទាបទេ ។ នៅកន្លែងខ្លះ គេស្អោះសំបកធ្វើថ្នាំ ។ មែកបែកសាខា ។ មានពេលណា ស្លឹកជ្រុះអស់រលីង ។ រួចអំពីនោះមិនយូរប៉ុន្មាន មានស្លឹក ផ្កា ផ្លែ ឡើងវិញ ។ ក្នុងផ្លែនីមួយៗមានសំបក សាច់ ហើយ នឹង គ្រាប់តែមួយ ។



## ៣៤_ អំពីដើមដូង

ខ្មែរយើងច្រើនដាំដើមដូងនៅក្បែរផ្ទះ ។ ដើមដូងមូលត្រង់ហើយខ្ពស់ ។ ដើមដូងគ្មានមែកទេ មានតែធាង ។ ស្លឹកវាវែងហើយស្រួច ។ ផ្លែវាមូល ហើយដុំគ្នាជាធ្លាយ ។ ក្នុងផ្លែនីមួយៗមានសំបកវលា សាច់ហើយនឹងទឹក ។

ដើមដូង ជារុក្ខជាតិមានប្រយោជន៍ណាស់ ។ គេយកឫសវាធ្វើជាថ្នាំកែរោគ ។ ដើមប្រើធ្វើជាទទឹក ឬជាសសរ ។ ស្លឹកសំរាប់គុបតែងលំអរោងបុណ្យទាន ។



## ៣៥– នៅស្រុកស្រែ

រដូវវស្សា អ្នកធ្វើស្រែនឿយណាស់ ។ ខ្លះដើរតាមនង្គ័ល ក្នុងទឹក នៅវេលាថ្ងៃក្ដៅ ដើម្បីនឹងភ្ជួរស្រែ ។ ខ្លះទៀតឈរនៅលើរនាស់គ្រវីត្មោងកំញើញគោ ឬក្របី ឲ្យវាប្រឹងដើរដោយរួសរាន់ ។ ស្រី ៗ ណាត់សំពត់ឬខោ ចុះទៅក្នុងភក់ត្រឹមជង្គង់ ដើម្បីនឹងដក ឬ ស្ទូងស្រូវ ។ ក្មេង ៗ អង្គុយលើខ្នងគោឬក្របី បណ្ដោយឲ្យស៊ីស្មៅតាមភ្លឺស្រែ ។



## ៣៦–នៅស្រុកស្រែ (ត)

ក្នុងរដូវលំហើយ វេលាដែលខ្យល់ត្រជាក់បកមកពីទិសឯជើង ស្រូវស្រែទុំក្រហមឆ្អៅ ។ ប្រុសស្រីភ្ញាក់ពីព្រលឹមជួតក្បាលធំសំពោងនាំគ្នាទៅស្រែ ។ អ្នកទាំងនេះកាន់កណ្ដៀវមួយម្នាក់ៗ ទៅច្រូតស្រូវ ។ គេចងដើមស្រូវជាកណ្ដាប់ រួចគេប្រមូលយកទៅរៀបជាគំនរក្នុងលាន ។ ខ្មែរយើងចេះលើកដៃគ្នាច្រូតស្រូវយ៉ាងរហ័ស ។

ក្នុងវាលស្រែគេឮតែចម្រៀងដែលប្រុសស្រីច្រៀងតគ្នា ។

---

រហ័ស (ម. ថ. រ.ហាស់) ។



## ៣៧– ដំណើរតាមកប៉ាល់

ណាវ៉ធី ត្រូវទៅសួរបងវាឈឺនៅឯក្រុងភ្នំពេញ ។ វារៀបសំលៀកបំពាក់របស់វា ដាក់ក្នុងហឹបមួយតូចតាំងពីល្ងាច ។ លុះដល់ព្រឹកឡើងវាទៅចុះកប៉ាល់ ។ វាអង្គុយនៅលើជើងម៉ាជិតបំពង់ភ្លើង ។ លុះកប៉ាល់ចេញបានបន្តិចទៅ បិនដួមកទារថ្លៃកប៉ាល់ ហើយគេឲ្យបង្កាន់ដៃមួយសន្លឹក ។ នៅក្នុងកប៉ាល់ចុះមួយជើង ៗ មានអ្នកដំណើរច្រើនណាស់ ។



## ៣៨– អំពីក្រុងភ្នំពេញ

នៅក្រុងភ្នំពេញ ណាវ៉ាទីមិនហ៊ានដើរលេងតែម្នាក់ឯងទេ ពីព្រោះមានផ្លូវជាច្រើនកាត់គ្នាខ្វាត់ខ្វែង ។ ផ្ទះពីរឬបីជាន់ដែលសង់តាមមាត់ផ្លូវ មានភាពប្រហែល ៗ គ្នា ។ រថយន្ត តូច-ធំ ស៊ីក្លូ បរទៅបរមកឥតមានស្រាក ។ នៅតាមចិញ្ចើមផ្លូវ មហាជនប្រជ្រៀតគ្នាដើររកទិញអីវ៉ាន់ ។ ពេលយប់ នៅក្នុងផ្ទះ ឬ ក្រៅផ្ទះភ្លឺដូចជាពេលថ្ងៃ ដោយពន្លឺភ្លើងអគ្គិសនី ។

នៅទីក្រុងនេះ មានទំនិញគ្រប់មុខ ដែលមកពីប្រទេសក្រៅ ។



## ៣៩– ដំណើរតាមជើងគោក

ណាវ៉ាឌីត្រូវត្រឡប់ទៅផ្ទះវិញ ។ ពីល្ងាចវាទៅរកទិញសំបុត្រ លុះដល់ព្រឹកឡើងវាទៅចាំនៅកន្លែងបំណតរថយន្ត ។ មួយស្របក់រថយន្តមកដល់ ។ ណាវ៉ាឌីឡើងលើរថយន្ត ហើយអង្គុយត្រង់កន្លែង ដែលមានលេខដូចគេត្រានៅក្នុងសំបុត្រ ។

ដល់ម៉ោង រថយន្តក៏ចេញពីកន្លែងបំណត ។ ដំបូងគេបើកបន្តិចៗ ។ យូរទៅវារត់កាន់តែលឿនឡើងៗកាត់ភូមិ ឆ្លងស្ពានបុះសាឡុង ។



## ៤០– ព្រះអាទិត្យ និង ព្រះចន្ទ

ព្រះអាទិត្យរះនៅទិសងកើត ។ ពេលលោកទៅនៅចំពីលើក្បាលយើងគេសន្មតជាថ្ងៃត្រង់ ។ ចាប់ពីពេលនេះទៅទល់នឹងថ្ងៃលិច នៅទិសខាងលិច គេថារសៀល ។ វេលាយប់ព្រះចន្ទធ្វើដំណើរដូចព្រះអាទិត្យ ។

ព្រះអាទិត្យ និង ព្រះចន្ទ ប្រជែញគ្នាយ៉ាងនេះ ឥតមានឈប់ឈរឡើយ ។ លុះដល់លោកប្រទះគ្នាម្តង ៗ នៅពេលយប់ បុរាណយើងសន្មតថា រាហូចាប់ចន្ទ ។

សូមអញ្ជើញចូលមើល



# ហាង ហង្ស រី

លេខ ៩៣ – ៩៥ – ៩៧, វិថីអង្គអេង ក្រុងភ្នំពេញ

## មានទាំង

## រោងពុម្ព =

ដែលបានរៀបចំតាមទំនើបថ្មី

ការងារហ្មត់ចត់ ធ្វើតាមបង្គាប់

បោះពុម្ពសៀវភៅគ្រប់បែប :

ជាខ្មែរ – ជាបារាំង – ជាកុកងឺ – ជាចិន

ចងក្រុបសៀវភៅយ៉ាងល្អវិសេស

ធ្វើការរហ័ស ហើយត្រឹមត្រូវ

## បណ្ណាគារ =

បោះពុម្ពផ្សាយសៀវភៅបារាំង សៀវភៅខ្មែរ

មានលក់សៀវភៅសម្រាប់រៀន ខ្មែរ បារាំង សុទ្ធសឹងតែបាន

ជ្រើសរើសយ៉ាងដេត ៗ ព្រមទាំងសៀវភៅប្រលោមលោកផង

មានលក់វចនានុក្រមបារាំង និងរូបថតអ្នកសិល្បៈដ៏ចំណាន

## គ្រឿងប្រដាប់សរសេរ =

ទទួលលក់ជូនរាជការ :

= មានប្រដាប់សម្រាប់ប៊ុយរ៉ូ បែបក្រុងប៉ារីស

= មានប្រដាប់សម្រាប់សិស្ស

ក្រដាសសរសេរគ្រប់ខ្នាត – គ្រប់គុណ (លក់រាយ—លក់ដុំ)

មានសៀវភៅសរសេរ និងសៀវភៅបញ្ជី

**សូមអញ្ជើញតម្រិះមកបះ យើងខ្ញុំនឹងធ្វើជូនឲ្យបានពេញចិត្ត**